សារព័ត៌មាន ខ្មែរផុស ស.រ.អា

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 978-942-1641


មាតិការរឿង **Issue 169 Jan.23rd. -Feb.5th. 2015** **Free**




**Office:** Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852


## វិចារណកថា

## ស្វាគមន៍ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ ធម្មិកោ

**ដោយ : ពិន សំខុន**

ស្តេចមួយអង្គថ្មីទៀត ព្រះនាមព្រះអង្គម្ចាស់ស៊ីសុវត្ថិ ធម្មិកោ ទើបតែមកដល់ឡូវែល ថ្ងៃទី២២មករា ២០១៥ ។ **តទៅទំព័រទី ០៣**



# ក្រុងឡូវែលនឹងក្រុងភ្នំពេញជាកូនភ្លោះ

លោកអភិបាលក្រុងភ្នំពេញ ប៉ា សុជាតិវង្ស នឹងលោកអភិបាលក្រុងឡូវែលរដ្ឋម៉ាសាឈូសិតសហរដ្ឋអាមេរិកលោក រ៉តនី អេលីយ៉ុត ទើបនឹងខាបចុះហត្ថលេខាព្រមព្រាងគ្នានៅទីក្រុងភ្នំពេញបង្កើតក្រុងកូនភ្លោះកាលពីថ្ងៃទី១៧មករា ឆ្នាំ២០១៥។

**សូមអានទៅទំព័រ ៩**


រ៉ូដ នី អ៊ីលៀត អភិបាលក្រុងឡូវែល និងអភិបាលក្រុងភ្នំពេញ ប៉ា សុជាតិវង្ស ចុះហត្ថលេខានៅក្រុងភ្នំពេញ



## គណបក្សហ៊្វុនស៊ិនប៉ិចត្រៀមចូលប្រយុទ្ធចូលសភា

**ដោយ : ខ្មែរផុស ស.រ.អា.**

គណបក្សហ៊្វុនស៊ិនប៉ិចដែលឈ្នះឆ្នោតនៅសភាជាតិកាលពីឆ្នាំ១៩៩៣ ឥឡូវគ្មានអាសនៈអ្វីសោះនោះ បានបើកសមាជបក្សនាសប្តាហ៍នេះនៅកោះពេជ្រ ដើម្បីជ្រើសតាំងគណកម្មការនាយកថ្មីរបស់ខ្លួន ។ សមាសភាពអ្នកគ្រប់គ្រងថ្មីដែលគេមិនសូវភ្ញាក់ផ្អើលបានធ្លាក់ទៅ: ប្រធានគណបក្សគឺព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ អនុប្រធានទី១: ម្ចាស់ក្សត្រីនរោត្តម អារុណរស្មី អនុប្រធានទី២: លោកញឹក ប៊ុនឆៃ ។ **តទៅទំព័រទី ១៥**



ម្ចាស់ក្សត្រីអារុណ រស្មី និងទ្រង់ រណឫទ្ធិ

# ដំណើរពីអាមេរិកទៅអាស៊ី (ភាគ៩)

តពីលេខមុន

ច្រើនស្តាប់មិនយល់ទៅវិញរាប់ទាំងកូនស្រីខ្ញុំ ផង) ។ មិនត្រឹមប្រារព្ធពីធីប្រទានពរមង្គលការតែប៉ុណ្ណោះទេ ព្រះអង្គសព្វព្រះរាជហឫទ័យឱ្យនិយាយលេងនឹងតាំងសំនួរយ៉ាងសេរី...នៅពេលកូនស្រីខ្ញុំ មីរាជី សួរជាភាសាបារាំងថា តើព្រះអង្គនិយាយប៉ុន្មានភាសា? ព្រះអង្គមានព្រះបន្ទូលតបថា និយាយបានពាភាសា គឺខ្មែរ បារាំង នឹងភាសាឆេកូដែលព្រះអង្គធ្លាប់រៀនសូត្រពីក្មេង... នៅពេលដែលជនួងបារាំងខ្ញុំឈ្មោះ "សែជ" រលឹកពីទំនាក់ទំនងល្អរវាងខ្មែរនឹងបារាំងព្រះអង្គមានព្រះបន្ទូលតបជាភាសាបារាំងថា ព្រះបីតាព្រះអង្គចូលចិត្តវប្បធមិបារាំងណាស់ តែយើងឥឡូវនេះមិនត្រឹមតែជាមិត្តទេ ថែមទាំងទៅជាគ្រួសារថែមទៀត (ដោយសារម្តាយមីរ៉ាតីជាម្តាយមីងរបស់ព្រះអង្គ) ។ ខ្ញុំក៏បានតាំងសំនួរផ្សេងមួយទៀតដែរ អំពីព្រះខ័ន្ធនឹងមកុដរាជដែលចុងក្រោយបង្អស់គេដឹងថា ព្រះអង្គម្ចាស់នរោត្តមកន្តុលជាអ្នកថែរក្សា តើព្រះអង្គដឹងថា ឥឡូវនេះ នៅទីណាឬទេ? មានគេចាប់ព្រះអង្គកន្តុលយកទៅធ្វើបាប ហើយយករបស់រាជ្យសម្បត្តិទៅលក់ឱ្យឯកជន ឥឡូវរបស់នោះនៅផ្ទះឯកជន...ខ្ញុំនឹកគិតថា ឱ្យតែព្រះអង្គដឹងថានៅឯណាសម្បត្តិរាជ្យនោះត្រឡប់មកព្រះបរមរាជវាំងខ្មែរវិញ ជាមិនខានឡើយ....។ ខ្ញុំសង្កេតឃើញថា ស្តេចអង្គនេះជាមនុស្សស្ងប់ស្ងៀមស្គាល់បុណ្យស្គាល់បាបមិនដែលធ្លាប់ឮថា ប្រឡាក់ប្រឡូសនឹងរឿងអាស្រូវណាមួយមកដល់ត្រឹមតែប៉ុណ្ណេះ គឺជាលក្ខណៈសម្បត្តិជាស្តេចសុច្ចរិតមួយអង្គដែលកម្រនឹងរកបានណាស់ទៅហើយ លើសពីនេះ អ្នកនៅក្នុងវាំងនិយាយថា ព្រះអង្គធ្វើសមាធិមិនសោយក្រយាពេលល្ងាចទេ។ ព្រះអង្គមិនមានមហេសីឬស្នំឯកតែនេះនៅតែជាលក្ខណៈធម្មជាតិ ដូចគេឯង មិនមែនជាពិការភាពទេ ពិសេសទៅទៀតនោះ ព្រះអង្គធ្លាប់សម្តែងភាពមិនលោភនឹងចង់បានរាជ្យសម្បត្តិទេ ។ សវនាកិច្ចផង ថតរូបអនុស្សាវរីយផង អស់ពេលមួយម៉ោងគត់ក្នុងបរិយាកាសដ៏រីករាយស្និតស្នាលនឹកមិនដល់... យើងក៏នាំគ្នាថ្វាយបង្គំលាព្រះមហាក្សត្រ នាមាត់ជណ្តើរមុខប្រាសាទ ពេលនោះខ្ញុំក៏មានឱកាសនិងណែនាំសូបិនឱ្យព្រះអង្គស្គាល់ថា សូបិន ជាអ្នកកំណើតកម្ពុជាក្រោម ស្រាប់តែព្រះអង្គឱទានថា "អាណិតណាស់!" ដ៏គួរឱ្យចំលែកព្រះអង្គបន្តដោយព្រះភក្ត្រក្រៀមក្រំថា "សូមពាំនាំសេចក្តីស្រឡាញ់នឹងនឹករលឹកពីសម្តេចព្រះមាតានឹងពីព្រះអង្គដល់កូនចៅនៅឯស្រុកក្រោមផង!" ។ រថយន្ត "វ៉ែន" ទាំង២គ្រឿង និងម៉ូតូនាំមុខនៅចាំយើងនៅជើងជណ្តើរព្រះរាជដំណាក់ រួចនាំពួកយើងចេញដំណើរក្រោមសញ្ញាលើកដៃទាំងពីរលាគ្នារវិចរបស់ព្រះមហាក្សត្ររហូតដល់ម៉ូតូនឹងឡានចេញផុតពីក្លោងទ្វារវាំង ទើបព្រះអង្គសម្រេចដាក់ព្រះហត្ថហើយយាងត្រឡប់ចូលព្រះរាជដំណាក់វិញ ហាក់ដូចជានៅអាឡោះអាល័យនៅឡើយ ។


ព្រះមហាក្សត្រនរោត្តម សីហមុនី



ស្អែកឡើងពេលយើងចេញដំណើរទៅបាត់ដំបងនឹងបន្តរទៅសៀមរាបទៀតនោះ ទូរទស្សន៍កម្ពុជាបានចាក់ផ្សាយពីសកម្មភាពព្រះមហាក្សត្រនៅព្រះបរមរាជវាំង ក្នុងពីធីមង្គលការកូនស្រីខ្ញុំរៀបចំទាំងស្រុងយ៉ាងល្អិតដោយម្តាយរបស់គេ ។

មិនត្រឹមប្រារព្ធពិធីប្រទានពរមង្គលការតែប៉ុណ្ណោះទេ ព្រះអង្គសព្វព្រះរាជហឫទ័យឱ្យនិយាយ

តទៅទំព័រទី ៤

## តមកពីទំព័រទី ០១ ស្វាគមន៍ព្រះអង្គម្ចាស់ស៊ីសុវត្ថិ...

ផ្ទុយពីស្តេចអង្គឯទៀតៗ ដែលបានធ្វើនយោបាយឱ្យអាសោចន៍ឈ្មោះព្រះញាតិវង្ស ព្រះមហាក្សត្រ ហើយដែលគណបក្សសង្គ្រោះជាតិមិនឱ្យចូលបៀតខ្លួននោះ បែរជាគណបក្សសង្គ្រោះជាតិទទួលព្រះអង្គម្ចាស់រូបនេះ យ៉ាងកក់ក្តៅដែលគេពុំសូវដែលស្គាល់ព្រះនាមពីមុនមកផងទៅវិញ តើស្តេចមួយព្រះអង្គនេះ ជានរណា?

ក្នុងរូបភាពនេះ គណបក្សសង្គ្រោះជាតិបានបង្ហាញរូបភាពមួយទៀត ដែលគេមិននិយាយថាគណបក្សសង្គ្រោះជាតិក៏ត្រូវការរាជានិយមដើម្បីកសាងជាតិដែរ ដោយសាររាជានិយមនេះហើយដែលបានកសាងប្រទេសកម្ពុជា តាំងពី ២០០០ឆ្នាំមកហើយ ហើយប្រជាពលរដ្ឋក៏ត្រូវការឃើញស្តេចរបស់ខ្លួននៅបន្តកសាងនគរជាមួយរាស្ត្រខ្លួនឯងដ៏មាំមួននឹងខ្លាំងខ្លានៅឡើយ ។ គ្មាននរណាស្គាល់ស្តេចមួយអង្គថ្មីនេះជាងលោក សម រង្ស៊ី នឹងព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ នោះទេ តែព្រះអង្គម្ចាស់ ថូមីកូ ក៏មិនមែនជាអ្នកនយោបាយជើងខ្ចីនោះដែរ ពីព្រោះព្រះអង្គបានកាន់ជាប្រធាននៃគណបក្សហ្វ៊ុនស៊ិនប៉ិចដំបូងគេបង្អស់ នាអំឡុងឆ្នាំ១៩៨១-៨២ នៅប្រទេសបារាំងអមដំណើរកៀកស្មាគ្នាជាមួយ សម រង្ស៊ី នេះឯង រហូតដល់បានរីកសុះសាយពេញពិភពលោកប្រឆាំងនឹងវត្តមានអណានិគមន៍យួននៅកម្ពុជា តាមព្រះរាជនយោបាយនៃសម្តេចនរោត្តម សីហនុ ។ រហូតដល់ឆ្នាំ១៩៨៨ ទ្រង់រណឫទ្ធិ បានទទួលការតែងតាំងជាប្រធានគណបក្សហ្វ៊ុនស៊ិនប៉ិច



នឹងជាប្រធានរណសិរ្សនៅទល់ដែនខ្មែរថៃពីសម្តេច សីហនុ រីឯទ្រង់ ធម្មិកោ ក៏បានត្រូវប្រធានថ្មីបំភ្លេចចោលយ៉ាងស្ងាត់ស្ងៀមរហូតដល់ថ្ងៃនេះ ដោយសារតែទ្រង់ ធម្មិកោ ជាខ្សែស៊ីសុវត្ថិ ធ្លាប់មានប្រវត្តិជាព្រះញាតិវង្ស "ស្តេចសាធារណរដ្ឋនិយម" តាមគំរូទ្រង់ ស៊ីសុវត្ថិ សិរិមតៈ នៅសល់តែ សម រង្ស៊ី ម្នាក់ប៉ុណ្ណោះ ដែលនៅបំរើហ្វ៊ុនស៊ិនប៉ិចបានជាប់រហូតដល់ហ្វ៊ុនស៊ិនប៉ិចបណ្តេញចោលនៅឆ្នាំ១៩៩៤ទៀត ។ ជាស្តេចជាសាធារណរដ្ឋនិយម? យល់នេះមិនជាខុសដែរ ខ្សែខាងស៊ីសុវត្ថិច្រើនជាអ្នករៀនសូត្របានច្រើនយល់ពីនយោបាយបំរើរាស្ត្រច្រើនជាងស្រឡាញ់ខ្លួនឯងជាព្រះញាតិវង្ស ហើយទ្រង់ ធម្មិកោ ជាស្តេចរបៀបនេះក្នុងជីវិតរស់នៅរបស់ទ្រង់ ។

ឥឡូវនេះព្រះអង្គព្រះជន្ម៦២វស្សាជារាជបុត្ររបស់អតីតឯកអគ្គរាជទូតកម្ពុជាប្រចាំអាល្លឺម៉ង់ខាងកើត គឺព្រះអង្គម្ចាស់ស៊ីសុវត្ថិ មេធាវី នឹងម្ចាស់ក្សត្រីយ អានម៉ារី ដែលបានត្រឡប់តែមួយអង្គឯងទៅក្នុងប្រទេសនាឆ្នាំ១៩៧៥ តាមការកោះហៅរបស់របបខ្មែរក្រហម ទើបនឹងឈ្នះសង្គ្រាមក្នុងស្រុក ។ បាត់ដំណឹងពីព្រះស្វាមីម្ចាស់ក្សត្រីយក៏ចូលទៅក្នុងប្រទេសតាមរកបែរជាបានទៅជួបគ្នា ហើយនៅជាប់គុកបឹងត្របែកដែលពេលនោះ លោករដ្ឋមន្ត្រីក្រសួងការបរទេសបច្ចុប្បន្ន ហោ ណាំហុង ជាប្រធានគុក... បន្ទាប់មកក៏បាត់ដំណឹងសូន្យឈឹងទាំង២ព្រះអង្គ។ ព្រះអង្គម្ចាស់ ធម្មិកោ ធ្លាប់ជាជំនួយការក្នុងខុទ្ទកាល័យព្រះមហាក្សត្រនរោត្តម សីហនុ នៅភ្នំពេញមុនព្រះអង្គចូលទីវង្គត់បច្ចុប្បន្នជាទីប្រឹក្សាព្រះមហាក្សត្រនរោត្តម សីហមុនី ជាបន្តទៅទៀត។

ព្រះអង្គសម្រេចព្រះទ័យចូលរួមនៅក្នុងគណបក្សសង្គ្រោះជាតិ ជាងទៅជាសមាជិកគណបក្សហ្វ៊ុនស៊ិនប៉ិចចុងក្រោយនេះ អាចជាការទិទៀនថាព្រះអង្គក្បត់គណបក្សរាជានិយមដែលព្រះអង្គជាព្រះញាតិវង្សផងនោះ ក៏ប៉ុន្តែគណបក្សសង្គ្រោះជាតិមិនដែលឮថា តាំងខ្លួនជាគណបក្សសាធារណរដ្ឋនិយមម្តងណាទេ ហើយសម្តេចនរោត្តម ស៊ីហនុ ក៏មិនដែលឮហាមឃាត់ព្រះញាតិវង្សណាម្នាក់មិនឱ្យចូលជាសមាជិកគណបក្សនឹងនិន្នាការនយោបាយណាមួយទេ ។ មកទល់ពេលនេះ យើងអាចមើលឃើញថា គណបក្សសង្គ្រោះជាតិដែលមានការគាំទ្រដ៏ធំធេងពីសំណាក់ពលរដ្ឋដែលឆ្អែតនឹងឈប់ខ្លាចរបបផ្តាច់ការគ្រប់ជំនាន់ គឺជាគណបក្សតែមួយគត់ដែលអាចនឹងមានលទ្ធភាពឆ្លាក់នឹងរចនាព្រះរាជាណាចក្រកម្ពុជាថ្មីមួយបានដែលក្នុងនោះទោះជាស្តេច

តទៅទំព័រទី ១៥

# មើលត្រឡប់ទៅឆ្នាំ២០១៤

By Richard P. Howe Jr.



Richard Howe

ខាងក្រោមនេះជាបញ្ជីស្តីពីព្រឹត្តិការណ៍នយោបាយសំខាន់ៗ ដែលបានកើតឡើងនៅឆ្នាំ២០១៤

-រ៉ាឌី ម៉ម បានជាប់ឆ្នោតជាដំណាងរដ្ឋសម្រាប់សង្កាត់ "មិឌលសិចលេខ១៨" នៅខែវិច្ឆិកា

-ខេវិន ម័រហ្វី បានក្លាយទៅជានាយកគ្រប់គ្រងសាលាក្រុងឡូវែលនៅខែមេសា

-គណក្រុមប្រឹក្សាក្រុងឡូវែលបានចូលកាន់ដំណែងនៅខែមករាភ្លាមបន្ទាប់មកបោះឆ្នោតជ្រើស រ៉តនីយ អេលីយ៉ុត ជាអភិបាលក្រុងរបស់ឡូវែល។ ទីប្រឹក្សាក្រុងថ្មីមាន អេលីយ៉ុត - រីតា មើសៀ - អេដ កេណ្ណឺឌី - ប៊ីល ម៉ាទីន នឹង ចន ឡេរី ហើយនឹងអ្នកចូលថ្មីមាន ដង រ៉ក -ប៊ីល សាមារា -ជីម មិលិណាសូ នឹង កូរី បាឡិនជ័រ (ចូលមកជំនួស ម៉ាទី ឡរេ - ចូ មិនដងកា - នឹង វ៉ាស្នា នួន ដែលមិនបានជាប់ឆ្នោត ចំណែកឯ ប៉ាទ្រិក ម័រហ្វី មិនបានឈរឈ្មោះ)

-អគ្គីភ័យនាព្រលឹមថ្ងៃទី១០កក្កដាមួយបានឆាបឆេះអាគារសង់ឡើងសម្រាប់គ្រួសារច្រើនរស់នៅស្ថិតនៅផ្លូវ "ប្រេន" បណ្តាលឱ្យស្លាប់មនុស្ស ៧នាក់ ហើយបាននាំឱ្យសហគមន៍ទាំងមូលចូលរួមកាន់ទុក្ខអ្នកស្លាប់ជុំគ្នា

-ក្រុមប្រឹក្សាភិបាល "បាស្កិត ម៉ាខិត" មានបំណងបណ្តេញប្រធាន អាទ័រ ធី ឌីម៉ូឡាស ចេញពីប្រធានការិយាល័យសហគ្រាសបានត្រូវបុគ្គលិកធ្វើកុប្បកម្មប្រឆាំងដោយដើរចេញពីកន្លែងធ្វើការ អតិថិជនក៏បានគាំទ្រចលនាបុគ្គលិកអស់ជាច្រើនសប្តាហ៍ រហូតដល់មានការយល់ព្រមចរចាគ្នាដោះស្រាយទំនាស់ ដោយលក់ភាគហ៊ុនឱ្យ អាទ័រ ធី ទាំងអស់

-បោះឆ្នោតក្នុងរដ្ឋទាំងមូល ឆាលិ បេគឺ បានឈ្នះលើ ម៉ាថា ខកលី ក្នុងដំណែងអភិបាលរដ្ឋ ទោះបីជាឈ្នះក្តី ក៏ចាញ់ឆ្នោត ម៉ាថា ខកលី នៅឡូវែលដែរ ។ ជាមួយគ្នានេះដែរ ម៉ូរ៉ា ហែលី ដោយមានការគាំទ្រពីមនុស្សជាច្រើននៅឡូវែលបានជាប់ឆ្នោតជាអគ្គមេធាវី នៅម៉ាសាឈូសិតក្នុងការឃោសនាដណ្តើមការិយាល័យលើកដំបូងរបស់លោកស្រី

តទៅទំព័រទី ១៦

# Looking Back at 2014

### Here is my list of the top political events in Lowell during 2014:

-Rady Mom was elected State Representative for the 18th Middlesex District in November

-Kevin Murphy became Lowell City Manager in April

-A new Lowell City Council took office in January and immediately elected Rodney Elliott to be Mayor of Lowell. The new councilors were Elliott, Rita Mercier, Ed Kennedy, Bill Martin and John Leahy and new-comers Dan Rourke, Bill Samaras, Jim Milinazzo and Corey Belanger. (Prior council incumbents Marty Lorrey, Joe Mendonca and VesnaNuon had failed to win reelection and Patrick Murphy did not run).

- An early morning fire on July 10 at a multifamily apartment building on Branch Street left seven people dead and brought the community together in mourning for their loss.

-An attempt by the board of Market Basket to oust Arthur T. Demoulas from the office of president of the company led to a walkout by employees and a boycott by customers that lasted for weeks until the parties agreed to resolve the dispute by selling the entire company to Arthur T.

-Statewide, Republican Charlie Baker defeated Democrat Martha Coakley for governor although Coakley beat Baker in Lowell. Also, Maura Healey with strong support from many people in Lowell was elected Attorney General of Massachusetts in her first campaign for office.

-The Cambodian Mutual Assistance Association celebrated its 30th anniversary in Lowell.

-In May, Governor Patrick came to Lowell to proclaim Asian American Heritage Month and Bill Nye the Science Guy was the commencement speaker at UMass Lowell.

What about 2015? What will the new year bring **Continued to Page 16**

តមកពីទំព័រទី ០២

## ដំណើរពីអាមេរិកទៅអាស៊ី...

លេងនឹងតាំងសំនួរយ៉ាងសេរី... នៅពេលកូនស្រីខ្ញុំ មីរាជី សួរជាភាសាបារាំងថា តើព្រះអង្គនិយាយប៉ុន្មានភាសា? ព្រះអង្គមានព្រះបន្ទូលតបថា និយាយបានពភាសា គឺខ្មែរ បារាំង នឹងភាសាឆេកូ ដែលព្រះអង្គធ្លាប់រៀនសូត្រពីក្មេង...នៅពេលដែលជនួងបារាំងខ្ញុំឈ្មោះ "សែជ" រំលឹកពីទំនាក់ទំនងល្អរវាងខ្មែរនឹងបារាំងព្រះអង្គមានព្រះបន្ទូលតបជាភាសាបារាំងថា ព្រះបិតាព្រះអង្គចូលចិត្តវប្បធមិបារាំងណាស់ តែយើងឥឡូវនេះ មិនត្រឹមតែជាមិត្តទេ ថែមទាំងទៅជាគ្រួសារថែមទៀត (ដោយសារម្ដាយ មីរ៉ាតី ជាម្ដាយមីងរបស់ព្រះអង្គ)។ ខ្ញុំក៏បានតាំងសំនួរផ្សេងមួយទៀតដែរ អំពីព្រះខ័ន្ធនឹងមកុដរាជដែលចុងក្រោយបង្អស់គេដឹងថា ព្រះអង្គម្ចាស់នរោត្តមកន្ទុលជាអ្នកថែរក្សា តើព្រះអង្គដឹងថា ឥឡូវនេះ នៅទីណាឬទេ? មានគេចាប់ព្រះអង្គកន្ទុលយកទៅធ្វើបាប ហើយយករបស់រាជ្យសម្បត្តទៅលក់ឱ្យឯកជន ឥឡូវរបស់នោះនៅផ្ទះឯកជន... ខ្ញុំនឹកគិតថា ឱ្យតែព្រះអង្គដឹងថានៅឯណាសម្បត្តិរាជ្យនោះ ត្រឡប់មកព្រះបរមរាជវាំងខ្មែរវិញជាមិនខានឡើយ...។ ខ្ញុំសង្កេតឃើញថា ស្ដេចអង្គនេះជាមនុស្សស្ងប់ស្ងៀមស្គាល់បុណ្យស្គាល់បាបមិនដែលធ្លាប់ឮថា ប្រឡាក់ប្រឡូសនឹងរឿងអាស្រូវណាមួយ មកដល់ត្រឹមតែប៉ុណ្ណេះ គឺជាលក្ខណៈសម្បត្តិជាស្ដេចសុច្ចរិតមួយអង្គដែលកម្រនឹងរកបានណាស់ទៅហើយ លើសពីនេះ អ្នកនៅក្នុង


សុបិន្ត ថ្វាយបង្គំគាល់ព្រះមហាក្សត្រ

វាំងនិយាយថា ព្រះអង្គធ្វើសមាធិមិនសោយក្រយាពេលល្ងាចទេ។ ព្រះអង្គមិនមានមហេសីឬស្នំឯកតែនេះនៅតែជាលក្ខណៈធម្មជាតិដូចគេឯង មិនមែនជាពិការភាពទេ ពិសេសទៅទៀតនោះ ព្រះអង្គធ្លាប់សម្ដែងភាពមិនលោភនឹងចង់បានរាជ្យសម្បត្តិទេ ។ សវនាកិច្ចផងថតរូបអនុស្សាវរីយផង អស់ពេលមួយម៉ោងគត់ក្នុង-បរិយាកាសដ៏រីករាយស្និតស្នាលនឹកមិនដល់... យើងក៏នាំគ្នាថ្វាយបង្គំលាព្រះមហាក្សត្រ នាមាត់ជណ្ដើរមុខប្រាសាទ ពេលនោះខ្ញុំក៏មានឱកាសនឹងណែនាំសូបិនឱ្យព្រះអង្គស្គាល់ថា សូបិន ជាអ្នកកំណើតកម្ពុជាក្រោម ស្រាប់តែព្រះអង្គឧទានថា "អាណិតណាស់!" ដំគួរឱ្យចំលែកព្រះអង្គបន្តដោយព្រះភ័ក្ត្រក្រៀមក្រំថា "សូមពាំនាំសេចក្ដីស្រឡាញ់នឹងនឹករលឹកពីសម្ដេចព្រះមាតានឹងពីព្រះអង្គដល់កូនចៅនៅឯស្រុកក្រោមផង!"។ រថយន្ត "វ៉ែន"ទាំង២គ្រឿង នឹងម៉ូតូនាំមុខនៅ


សែក និងហ្វ្រង់ ស្វ៊ីហ្ស ចងដៃកូន


សូបិន្ត ចងដៃក្មួយ

តទៅទំព័រទី ៥

តមកពីទំព័រទី ០៤
## ដំណើរពីអាមេរិកទៅអាស៊ី...

ចាំយើងនៅជើងជណ្តើរព្រះរាជដំណាក់ រួចនាំពួកយើងចេញដំណើរក្រោមសញ្ញាលើកដៃទាំងពីរលាគ្នាវិចរបស់ព្រះមហាក្សត្រ រហូតដល់ម៉ូតូនឹងឡានចេញផុតពីក្លោងទ្វារវាំង ទើបព្រះអង្គសម្រេចដាក់ព្រះហត្ថហើយយាងត្រឡប់ចូលព្រះរាជដំណាក់វិញ ហាក់ដូចជានៅអាឡោះអាល័យនៅឡើយ ។

ចំណែកខ្ញុំជាឪពុកមិនបានធ្វើអ្វីធំដុំក្រៅតែពីមានខ្លួននៅពេលដែលកូនត្រូវការឱ្យបំពេញភារៈកិច្ចជាឪពុកបង្កើតតែប៉ុណ្ណោះ ចំណែកឯកូនស្រី មីរ៉ាដី ខ្ញុំក៏ចង់ឱ្យខ្ញុំធ្វើតែប៉ុណ្ណោះដែរ...ដែលគេបារម្ភនោះខ្លាចក្រែងតែខ្ញុំខកខានមិនបានទៅចូលរួមកម្មវិធីរបស់គេតែប៉ុណ្ណោះ ចំណែក ស៊ុរីយ៉ា ដែលជាម្តាយបង្កើតវិញ ថ្វីត្បិតតែយើងបែកគ្នាយូរក្រៃល




អរគុណភ្ញៀវនៅថ្ងៃបញ្ចប់នៃពិធីមង្គលការ

ស្អែកឡើងពេលយើងចេញដំណើរទៅបាត់ដំបងនឹងបន្តទៅសៀមរាបទៀតនោះ ទូរទស្សន៍កម្ពុជាបានចាក់ផ្សាយពីសកម្មភាពព្រះមហាក្សត្រនៅព្រះបរមរាជវាំងក្នុងពិធីមង្គលការកូនស្រីខ្ញុំរៀបចំទាំងស្រុងយ៉ាងល្អិត ដោយម្តាយរបស់គេដែលជាអនុរដ្ឋលេខាធិការក្រសួងព្រះបរមរាជវាំង

ទៅហើយក្តី យើងនៅមានទំនាក់ទំនងល្អជាមួយគ្នាជារៀងរហូត ដើម្បីឱ្យកូនស្រីទាំង៣មានអារម្មណ៍ធាត់ធំល្អ អាចក៏សាងជីវិតខ្លួនឯងបានគ្រាន់បើដោយហេតុយ៉ាងនេះហើយ បានជានៅឆ្នាំ១៩៩៨ បន្ទាប់ពីខ្ញុំចេញពីកម្ពុជាមករស់នៅ ស.រ.អា. កូនស្រីពៅមីរ៉ាដី នឹងបងស្រីគេ ទេវី

បានមកបន្តការរៀនសូត្រជាមួយខ្ញុំនឹងកូនចិញ្ចឹមខ្ញុំម្នាក់ទៀតឈ្មោះ វីរៈ ចិត្រ រហូតដល់ចប់មហាវិទ្យាល័យរៀង១ខ្លួន រីឯកូនបងស្រីគេបង្អស់មិនបានមករស់នៅអាមេរិកដូចប្អូនៗគេទេ គេនៅរៀនយកសញ្ញាប័ត្រវិជ្ជាជីវៈជំនាញនៅទីក្រុងប៉ារីស ក៏បានជោគជ័យដូចគ្នា ។ ការព្រាត់ប្រាស់របៀបនេះ នៅតែមកលងខ្ញុំនឹងបងប្អូនខ្មែរឯទៀតជាច្រើន ដែលមានស្ថានភាពដូចគ្នាឱ្យខឹងសម្បារនឹងប្រទេសកំណើតរបស់ខ្ញុំដែលមិនមានភាព


មកជួបគ្រូបង្ហាត់គ្រូវិបស្សនា



ហ៊ឹងហ៊ំ ដែលបានធ្វើឱ្យប្រជាពលរដ្ឋខ្លួនឯងរងគ្រោះថ្នាក់គ្រប់ជំហ៊ានយ៉ាងនេះ ។ ខ្ញុំនៅតែយល់ថា ថ្វីត្បិតតែមានជីវភាពប្រសើរជាងនៅកម្ពុជា ការព្រាត់ប្រាស់នេះ ពិតជាមិនមែនជាសំណាងទេ។

ដក់ក្នុងអារម្មណ៍វិលវល់ពីព័ត៌មានដ៏អាក្រក់ពីក្រៅប្រទេសនៅពេលត្រឡប់មកដល់កម្ពុជាសារជាថ្មីជួបទេសភាពថ្មីទំនើបនៃរាជធានីខ្មែរប្រកបដោយមនុស្សដណ្តើមគ្នារស់យ៉ាងសកម្ម... ប៉ុន្តែមិត្តភក្រ្តនឹងក្រុមគ្រួសារទាំងបារាំងទាំងខ្មែររីករាយនឹងបានចូលព្រះបរមរាជវាំងនឹងបានទទួលស្គាល់ថា បានក្លាយជាក្រុមគ្រួសាររបស់ព្រះអង្គម្ចាស់ដែលបានក្លាយជាព្រះមហាក្សត្រខ្មែរ ហើយជជែកគ្នាយ៉ាងគ្មានឿយហត់នៅតាមផ្លូវដ៏វែងឆ្ងាយសំដៅទៅខេត្តបាត់ដំបងដែលនៅទីនោះ មីរ៉ាដី នឹង ដេវី នឹងប្រារព្ធពិធីមង្គលការរបស់ខ្លួនតាមប្រពៃណីខ្មែរដែលទាំងអស់គ្នារង់ចាំជាយូរមកហើយដែរ ។

នៅតាមដងផ្លូវដែលកាត់ភូមិចាមច្រាំងចំរេះ បន្ទាប់មកដល់ព្រែកក្តាមរួចមកឆ្លងកាត់អតីតរាជធានីឧត្តុងផ្លូវតូចចង្អៀត កាលពី១០ឆ្នាំមុនបានប្រែជាធំទូលាយស្មើរធេងអមដោយផ្ទះថ្មនឹងភូមិស្រស់ស្អាតមានរថយន្តធំៗទំនើបបើកឆ្វាត់ឆ្វែងមិនដូចពេលមុនទៀតទេ តែក៏នៅ

សល់ដីទំនេរច្រើនរុក្ខជាតិបៃតងខ្ចីនៅឡើយដែលរំលឹកខ្ញុំពីអតីតកាលដ៏ក្រខ្សត់បានច្រើនណាស់ដែរ ។ ភ្លេចខ្លួនតែបន្តិច ក៏មកដល់ទីរួមខេត្តកំពង់ឆ្នាំងដែលបានរីកធំជាងមុនដូចគ្នានឹងទីប្រជុំខេត្តផ្សេងៗទៀតដែរ ។ ជូនជាថ្ងៃត្រង់ទៅហើយយើងក៏នាំគ្នាចតឡានចូលទៅហូបបាយនៅអាហារដ្ឋានស្អាតសមរម្យមួយនៅមិនឆ្ងាយពីផ្លូវជាតិទៅបាត់ដំបងទេ។

ដូចឈ្មោះនៃទីប្រជុំនៃខេត្តនេះកំពុងឆ្នាំងគឺជាកន្លែងសិប្បកម្មខ្នាតតូចៗនៃអ្នក ស្ទូន ឆ្នាំងលក់តាំងតែពីយូរយាណាស់មកហើយ ។ គេនៅប្រទះឃើញរទេះគោតាមផ្លូវជាតិផ្ទុកដោយរបស់របរសម្រាប់លក់ដូរពេញរទេះរាប់តាំងពីឆ្នាំងតូចធំ ទាំងជើងក្រានទាំងក្អមនឹងរបស់របរប្រើប្រាស់ក្នុងចង្ក្រានបាយខ្មែរដែលជាសម្ភារៈធ្វើពីដីឥដ្ឋដុតនៅឡើយ ។ មុខរបរនេះ ជាមុខរបរនៃអ្នកក្រីក្របំផុត ដែលគ្រួសារទាំងមូលរស់ក្នុងរទេះតែមួយនោះ ចេញដំណើរ២-៣ខែ មិនថាភ្លៀង ផ្គរ ខ្យល់អីទេ ទៅលក់ដូរបណ្តើរបានលុយមកចិញ្ចឹមគ្រួសារតាមផ្លូវបណ្តើរដល់លក់អស់ទំនិញ ទើបត្រឡប់មកផ្ទះវិញដើម្បីធ្វើរបស់របរដែលឡើងវិញ ផ្ទុកក្នុងរទេះចេញដំណើរទៅម្តងទៀត គ្មានថ្ងៃឈប់ម្ដោះហើយកូនចៅមិនបានទៅរៀនសូត្រអ្វីទេ។ កំពុងឆ្នាំងក៏មានធនធានផ្សេងទៀតដែរដូចជាមានទន្លេសាបជាជង្រុកនៃត្រីគ្រប់មុខតែរបរនេសាទនេះនិគមន៍យួនគេយកផ្តាច់មុខទៅហើយអ្នកស្រុកនិយាយថា ត្រីងៀត ត្រីឆ្អើរ ប្រហុក ផ្អក ចុះថយអស់ហើយ ដូច្នេះនៅសល់មុខរបរចម្លាក់រូបឈើឈើនឹងលក់គំនូរនឹងការងារលក់ដូរទំនិញយកមកពីបរទេស ឬផលិតផលរុក្ខជាតិ ។ល។ ដែលធ្វើឱ្យកំពុងឆ្នាំង ជាប្រជុំជនពាណិជ្ជកម្ម រដ្ឋបាល នយោបាយតែមិនឮថាជាប្រជុំជនសម្បូរសាលាធំៗសម្រាប់រៀនសូត្រទេ...។

យើងបានបន្តដំណើរទៅខេត្តបាត់ដំបងដោយឆ្លងកាត់ទីប្រជុំជនពោធិសត្វដោយមិនបានឈប់សម្រាកទីនោះទេ តែនៅពេលឆ្លងកាត់ដល់មោងឫស្សីដែលទេសភាពបានប្រែប្រួលជាទំនើបច្រើនណាស់ទៅហើយដែរនោះ ខ្ញុំនឹកទៅដល់ម្តាយនឹងប្អូនស្រីពៅបង្កើតរបស់ខ្ញុំដែលខ្ញុំបានទទួលដំណឹងយ៉ាងក្រៀមក្រំពីប្អូនជីដូនមួយមកថា "កាលជំនាន់ប៉ុល ពត បានមកស្លាប់នៅទីនេះម្តាយខ្ញុំស្លាប់ដោយគ្មានថ្នាំព្យាបាលនឹងអត់អាហារ រីឯប្អូនស្រី

តទៅទំព័រទី ១១

# លោក រ៉ាឌី ម៉ម ធ្វើកិច្ចសច្ចាប្រណិធានទទួលមុខតំណែង

**ដកស្រង់ដោយ : ថាច់ វណ្ណា**



លោក រ៉ាឌី ម៉ម និងលោកស្រី ស៊ីរ៉ាឌី ជាភរិយាព្រមទាំងក្រុមគ្រួសារបានប្រារព្ធធ្វើកិច្ចសច្ចាប្រណិធានទទួលមុខតំណែងជាសភាតំណាងរាស្ត្រ កាលពីថ្ងៃទី៧ មករា ឆ្នាំ២០១៥ ប្រចាំមណ្ឌលម៉ិដឌីលសិចទី១៨ ។

-ក្នុងរដ្ឋម៉ាសាឈូសេត មានសភាតំណាងរាស្ត្រចំនួន១៦០រូប ក្នុងនោះមាន១២៥រូបមកពីគណបក្សប្រជាធិបតេយ្យ និង៣៥រូបមកពីគណបក្សសាធារណៈរដ្ឋដោយឡែកក្នុងមណ្ឌលម៉ិដឌីលសិច មានសភាតំណាងរាស្ត្រចំនួន៣៧រូប ក្នុងនោះមាន៣៤រូប មកពីគណបក្សប្រជាធិបតេយ្យ និង៣រូបមកពីគណបក្សសាធារណៈរដ្ឋ ។ លោក រ៉ាឌី ម៉ម ជាតំណាងរាស្ត្រ១រូប ក្នុងចំណោម១៦០រូប ទូទាំងរដ្ឋម៉ាសាឈូសេតមានដើមកំណើតជាខ្មែរ នឹងជាជនទី១ បានធ្វើឱ្យប្រជារាស្ត្រខ្មែរអាមេរិកាំង មានឈ្មោះបញ្ចេញសម្លេងក្នុងរដ្ឋសភាអាមេរិកាំង ។



ប្រជារាស្ត្រខ្មែរអាមេរិកាំងក្នុងក្រុងឡូវែល ក៏ដូចជាប្រជារាស្ត្រខ្មែរអាមេរិកាំងទូទាំងសហរដ្ឋអាមេរិក មានមោទនភាពពោរពេញដោយក្តីសង្ឃឹមថា លោក រ៉ាឌី ម៉ម និងមានសមត្ថផលល្អក្នុងកិច្ចស្ថាបនាសង្គមជាតិរុងរឿងសម្បូរសប្បាយនឹងជាគំរូល្អសម្រាប់ប្រជារាស្ត្រខ្មែរអាមេរិកាំងយកតម្រាបតាម ។

ក្នុងកិច្ចសច្ចាប្រណិធានលោក រ៉ាឌី ម៉ម ពុំ បានសម្តែងនូវមតិអ្វីដែលធ្វើ ឱ្យសាធារណជនមានចំណាប់អារម្មណ៍ឡើយ ៕



# Multicultural Wedding Expo in Lowell

**By Champa Pang**

Every little girl has a dream to be the princess at her own wedding. At this dream wedding she wants to be surrounded by beautiful flowers, family, friends, wonderful food, great music and unimaginable décor. As an adult with school loans to pay off, anticipated mortgage payments, future child care costs, savings and emergency funds to set aside, how does the average hard working woman obtain such a dream wedding without sacrificing her financial security?



February 7th - Avent Creators which bases in Lowell has put together a Multi-Cultural Wedding Expo with goals to help the future brides in the Greater Merrimack Valley how make a cost-saving wedding plan. This multi-cultural event is compromised of various vendors that offers samples for a small fee, cake, caterer, photographer, make up, hair artists, health shakes, skin care products, jewelry, ect.

The expo will offer numerous discounts from businesses ranging from Lowell, Fitchburg, Lynn, Dracut, Burlington, Lexington, Revere, Wakefield and Chelmsford. Décor trends for the upcoming 2015 wedding season such as entrance, backdrop, cake table, dance floor, guest table, centerpieces, bouquets and party favors will all be at the expo. This creative event promotes wedding boutiques, salons and make up artists via fashion show of many traditional wedding outfits, gowns and sarees. The fashion show will include Vietnamese Bridal Ao Dai, Cambodian Wedding Attire, Laos Traditional Wedding Styles, Chinese Red Bridal Gowns, Thai Modern Wedding Outfits and Indian Bridal Sarees, Henna and Assessories.

The cost is $25, which includes 4 course dinner, cash bar, live band and DJ at Pailin Restaurant at 6 Branch Street, Lowell, MA 01851. Any vendor interested in being part the expo, or for ticket purchase information call 978 - 337 - 8644 or visit their website at www.weddingexpolowell.vpweb.com.

# ក្រុមបាតុករប្រឆាំង ថ្ងៃ ៧មករា

**ដកស្រង់ដោយ : ថាច់ វិណ្ណា**

ទីក្រុងឡូវែលនៅមុខស្ថានីយ៍កុងស៊ុលកាលពីថ្ងៃទី១០ មករា ឆ្នាំ ២០១៥ ប្រជារាស្ត្រអាមេរិកាំងដើមកំណើតខ្មែរប្រមាណ៥០នាក់បានធ្វើក្បួនបាតុកម្មប្រឆាំងថ្ងៃជ័យជំនះ៧មករាថា ជាថ្ងៃកងទ័ពវៀតណាមចូលឈ្លានពានទឹកដីកម្ពុជាតាមរយៈរដ្ឋាភិបាលដែលវៀតណាមបន្ទុបឡើង ។ មានបាតុករម្នាក់បាននិយាយថា : ពាក្យដែលរដ្ឋាភិបាលបច្ចុប្បន្ននិយាយថា ជាថ្ងៃរំដោះទឹកដីពីរបបប្រល័យពូជសាសន៍នោះ គ្រាន់តែជាការបិទបាំងនៅមហិច្ឆិតាឈ្លានពានទឹកដីរបស់យួនកុម្មុយនីស្តប៉ុណ្ណោះ ប្រសិនជាមានភស្តុតាងគ្រប់គ្រាន់បញ្ជាក់ថា របបបោលពតប្រល័យពូជសាសន៍មែននោះ ហេតុអ្វីបានជាសាលាកាត់ក្តីខ្មែរក្រហមអូសបន្លាយពេលរហូតពា៦ឆ្នាំកន្លងមក? នោះជាភាពជាក់ស្តែងធ្វើឱ្យពួកគេយល់ឃើញច្បាស់ពីគោលនយោបាយខ្មែររូប្បនិយកម្មមិនខុសគ្នានឹងកម្ពុជាក្រោមឡើយ ។ ក្រុមបាតុករ បានលើកទង់ និងបដារ ជាភាសាអង់គ្លេសនឹងភាសាខ្មែរថា : "ថ្ងៃ៧មករា ជាថ្ងៃដែលកងទ័ពវៀតណាមឈ្លានពានលើទឹកដីខ្មែរ" និងមានបដារខ្លះសរសេរថា : "We are cambodian American citizen we do not need consulate from cambodian working in the city of lowell" រួចពួកគេបាននិយាយថា : ពួកគេមិនត្រូវការកុងស៊ុលរបស់រដ្ឋាភិបាលអាយ៉ងយួនមកធ្វើការនៅទីក្រុងឡូវែលឡើយ ។

ចំណែកខាងស្ថានីយ៍កុងស៊ុលវិញ គេពុំឃើញមានប្រតិកម្មអ្វីឡើយ ។

បន្ទាប់មកក្រុមបាតុករក៏បាននាំគ្នាដង្ហែក្បួនមកខាងមុខផ្សារប៉ៃលិនវិញ លុះវេលាម៉ោង៥រសៀលទើបរំសាយ ៕










# វិទ្យាស្ថានសិក្សាភាសា និងវប្បធម៌ខ្មែររដូវក្ដៅនៅ សាកលវិទ្យាល័យយូម៉ាសឡូវែលឆ្នាំ២០១៥

ផ្ដល់ជូនដោយ

## ដេប៉ាតឺម៉ង់ភាសាសាកលនិងវប្បធម៌ និងមជ្ឈមណ្ឌលសិក្សាអាស៊ីអាមេរិកាំង

**កាលបរិច្ឆេទ:** ថ្ងៃទី១៧ ខែឧសភា ដល់ថ្ងៃទី៥ ខែមិថុនាឆ្នាំ២០១៥

**ទីកន្លែង:** សាកលវិទ្យាល័យយូម៉ាសឡូវែល

**អំពី:** ភាសាខ្មែរ និងវប្បធម៌កម្រិតខ្ពស់

-៥៣.១៣៥ភាសាខ្មែរ និងវប្បធម៌១ (៣ក្រេឌីត)

ថ្ងៃច័ន្ទ-ថ្ងៃព្រហស្បតិ៍ ម៉ោង៩:៣០-១១:០០ព្រឹក និងម៉ោង២:០០-៣:៣០ បង្រៀនដោយកញ្ញា ហេង លីមហ៊ាង

-៥៣.១៣៦ភាសាខ្មែរ និងវប្បធម៌២ (៣ក្រេឌីត)

ថ្ងៃច័ន្ទ-ថ្ងៃព្រហស្បតិ៍ ម៉ោង៩:៣០-១១:០០ព្រឹក និងម៉ោង២:០០-៣:៣០ បង្រៀនដោយកញ្ញា សូ ហ្វារីណា

-៥៣.២៣៥ភាសាខ្មែរ និងវប្បធម៌៣ (៣ក្រេឌីត)

ថ្ងៃច័ន្ទ-ថ្ងៃព្រហស្បតិ៍ ម៉ោង៩:៣០-១១:០០ព្រឹកនិងម៉ោង២:០០-៣:៣០ បង្រៀនដោយលោក ខូ តារាឫទ្ធិ

**សកម្មភាពផ្នែកវប្បធម៌:** របាំ និងភ្លេង, ភាពយន្ត,ចុះកម្មសិក្សា (សូមអានបន្ថែមនូវកម្មវិធីប្រចាំថ្ងៃ)

**ផ្ដល់ជូននូវកន្លែងស្នាក់នៅ :**

The new University Suites at UMass Lowell East Campus. Includes access to UML Recreation Centers.

University Suites: http://www.uml.edu/student-services/reslife/residence-halls/University-Suites.aspx

Recreation Centers: http://www.uml.edu/CampusRecreation/default.aspx

University Dining: http://www.campusdish.com/en-us/CSNE/UMassLowell

**តម្លៃ :**

**ជម្រើសទី១ :** ការសិក្សាដោយមិនទទួលយកការស្នាក់នៅ (តែមានសម្ភារ:សិក្សា, ទស្សនាភាពយន្ត, ស្ដាប់បទបង្ហាញ, ចុះកម្មសិក្សា, អាហារថ្ងៃត្រង់ និងអាហារពេលល្ងាចពីថ្ងៃច័ន្ទដល់ថ្ងៃសុក្រ): ១.៧៣៥ដុល្លារ។

**ជម្រើសទី២:** ការសិក្សារួមទាំងការស្នាក់នៅ (មានសម្ភារ:សិក្សា, ទស្សនាភាពយន្ត, ស្ដាប់បទបង្ហាញ, ចុះកម្មសិក្សា, អាហារថ្ងៃត្រង់ និងអាហារពេលល្ងាចពីថ្ងៃច័ន្ទដល់ថ្ងៃសុក្រ): ២្យ៣៣៥ដុល្លារ។

**ការចុះឈ្មោះ:**

សូមបំពេញនិងផ្ញើឯកសារដោយមានភ្ជាប់ជាមួយនូវទម្រង់បែបបទដើម្បីកក់ជាមុន។

ការបង់ថ្លៃសិក្សាកំណត់ទទួលយកត្រឹមថ្ងៃទី១ ខែមីនាឆ្នាំ២០១៥(សូមរួសរាន់ប្រញាប់ចុះឈ្មោះព្រោះកន្លែងមានកំណត់)។

សម្រាប់ព័ត៌មានបន្ថែមសូមទាក់ទង

បណ្ឌិត ចច ឈីហ្គាស, ដេប៉ាតឺម៉ង់ភាសាសាកល និងវប្បធម៌

**អ៊ីម៉ែល:**George_Chigas@uml.edu

**ទូរស័ព្ទ:** ៦១៧-៨០៣-៣៣០៧

វ៉ែបសាយ:http://www.uml.edu/Research/CAAS/News-Events

## សេចក្ដីអញ្ជើញ

គណបក្សសង្គ្រោះជាតិនៅ
រ៉ូដអាយឡិន



**ទីកន្លែង :** វត្តមជ្ឈមណ្ឌលព្រះពុទ្ធសាសនានៅព្រូវីដិនហ្គេន

អាស័យដ្ឋាន: 255 Public St., Providen RI

**ពេលវេលា :** ថ្ងៃអាទិត្យ ទី២៥ ខែមករា ឆ្នាំ២០១៥

Comtact: Ken S. UNG Team Leader




## តើអ្នកមានការធានារ៉ាប់រងសុខភាពឬទេ?

ដើម្បីស្វែងយល់ព័ត៌មានបន្ថែមអំពីការទទួលបានការធានារ៉ាប់រងឬដើម្បីផ្លាស់ប្ដូរការធានារ៉ាប់រងបច្ចុប្បន្នរបស់អ្នក៖

ប្រសិនបើអ្នកចង់ធ្វើដូចនេះដោយផ្ទាល់ខ្លួនរបស់អ្នក៖

ហូរទូរសព្ទ៍ទៅលេខ 1-800-318-2696ហើយសុំសួររកអ្នកបកប្រែជាភាសារបស់អ្នក

សូមចូលទៅwww.healthcare.govហើយធ្វើការចុះឈ្មោះតាមអនឡាញ

**ប្រសិនបើអ្នកចង់បានជំនួយ៖**

សូមទូរស័ព្ទមកSEAMAACតាមលេខ 215-467-0690 ដើម្បីធ្វើការណាត់ជួបជាមួយនិងអ្នកបង្ហាយផ្លូវ(Navigator)ឬទីប្រឹក្សារបស់កម្មវិធីសុខភាពដើម្បីពិភាក្សាអំពីជម្រើសផលប្រយោជន៍ផ្សេងៗការណាត់ជួបប្រព្រឹត្ត 1711 S. Broad Street, 2nd floorអ្នក បង្ហាយផ្លូវ (Navigator) ក៏អាចជួយអ្នកនៅតាមមណ្ឌលសុខភាពទីក្រុង និងអង្គការសហគមន៍ផ្សេងទៀត

សូមចាំថាត្រូវយកឯកសារទាំងនេះមកជាមួយ៖

ប័ណ្ណសន្តិសុខសង្គម(Social Security Card)កាតពណ៌បៃតង(Green Card)កាតការងារ(Employment Card)ឬ I-94កស្តុតាងនៃប្រាក់ចំនូលអត្តសញ្ញាណប័ណ្ណ (ID) ប្រសិនបើអ្នកមានObamacareកាលពីឆ្នាំមុនត្រូវយកព័ត៌មានធានារ៉ាប់រងនោះមក ជាមួយផង

# អភិបាលក្រុងឡូវែល សហរដ្ឋអាមេរិក នឹងស្នើឱ្យរដ្ឋាភិបាលកម្ពុជា ពិចារណាឡើងវិញចំពោះការឃុំខ្លួនសកម្មជន

**ដោយ ឃួន ណារិម AND ហ៊ូលលី រ៉ូបិនស៊ិន | JANUARY 17, 2015**

កាលពីថ្ងៃសុក្រ អភិបាលក្រុងឡូវែល (Lowell) រដ្ឋម៉ាសាជូសេត (Massachusetts) ដែលជាទីក្រុងមានពលរដ្ឋអាមេរិក ដើមកំណើតកម្ពុជារស់នៅច្រើនបំផុតទី២ក្នុងសហរដ្ឋអាមេរិក បានទៅសួរសុខទុក្ខសកម្មជនប្រឆាំងការបណ្តេញចេញចំនួន១០នាក់នៅក្នុងពន្ធនាគារព្រៃស ដោយប្រកាសថា លោកនឹងបញ្ចុះបញ្ចូលរដ្ឋាភិបាលឱ្យដោះលែងពួកគេ។

ដោយបញ្ចប់ដំណើរទស្សនកិច្ចចំនួនប្រាំថ្ងៃនៅរាជធានីភ្នំពេញ លោក រ៉ដនី អេលីយ៉ូត (Rodney Elliott) បានចំណាយពេលប្រហែលមួយម៉ោងនៅក្នុងពន្ធនាគារដែលមានសន្តិសុខយាមកាមតឹងរ៉ឹងបំផុតនេះ ជាកន្លែងឃុំឃាំងស្ត្រីសកម្មជនទាំងនេះចាប់តាំងពីពួកគេត្រូវបានតុលាការផ្តន្ទាទោសជុំវិញការតវ៉ាចំនួនពីរលើកកាលពីខែវិច្ឆិកាមក។ ប្រាំបួននាក់ក្នុងចំណោមស្ត្រីសកម្មជនទាំងនេះ មកពីតំបន់បឹងកក់ដែលមានប្រជាពលរដ្ឋប្រមាណ៣.០០០គ្រួសារត្រូវបានបណ្តេញចេញ **តទៅទំព័រទី ១៨**


អភិបាលក្រុងឡូវែល រ៉ដនី អេលីយ៉ូត

# Mayor Lowell United States will ask the government to consider back to the detained activists

**KHUONG, NUREMBERG AND HU BEN SIN | JANUARY 17, 2015**

On Friday, Mayor Lowell (Lowell), Massachusetts (Massachusetts), a city American citizens living in the 2nd most in the United States to visit activist against evictions out of 10 in Prey Sar prison, announced that he would be buried government to release them.

By completing the trip five days in the capital Tehran helium (Rodney Elliott), spent about an hour in prison Security guard most strict, where women's detention These activists since they were court Punishment around two protests last month November. Nine out among these women activists from the region Boeung Kak residents, about 3,000 families have been evicted forced out to make way for development projects A senator from the ruling party.

Before entering the prison, Rhode Eli raised "basic rights basic human rights that we get in the United States need to receive the same. These women, these land owners not seem procedures were wrong, and we think it's important to take matters into consideration. "

Inside the prison, Tep Vanny prominent human rights activist told Rhode Eli's home residents, about 600 families who are live in the lake, yet always flooded because without adequate drainage system.

She said, "We all were arrested Prison protest because we require that municipalities pump water out From our house afloat. " **Continued to Page 18**


គណៈបក្សប្រតិភូពីឡូវែលទៅជួបថ្នាក់ដឹកនាំគណបក្សសង្គ្រោះជាតិ ជូនប័ណ្ណកោតសរសើរ

# ឃាតករគេចខ្លួនពីហ្វីឡាដែលភៀវត្រូវចាប់បានមកវិញ

**ដកស្រង់ដោយៈ ថាច់ វណ្ណា**




តាំ មិន ឡៀ ហៅតាមវៀតណាម ឡៀ មិន តឹម អាយុ៤៣ឆ្នាំ ជាប់ចោទពីបទឃាតកម្មកាលពីថ្ងៃទី២៨សីហា២០១៤ នៅក្រុងភីឡាដែលភៀ ដោយបានសម្លាប់បងប្អូន២នាក់ឈ្មោះ វូ វិញ អាយុ៣២ឆ្នាំ និង វៀត វិញ អាយុ២៩ឆ្នាំ ទាក់ទងទៅនឹងការជួញដូរគ្រឿងញៀនមានតម្លៃ១០ម៉ឺនដុល្លា ។ ផ្ញើរនៅនឹង វូ និង វៀត អ្នកទាំង២ បានយកប្រាក់នោះទៅលេងល្បែងចាញ់អស់៦ម៉ឺន បណ្តាលឱ្យ តាំ ខឹងជាខ្លាំងរួចបានវាយសម្លាប់ វូ និង វៀត ហើយច្រក់ក្នុងបាវទម្លាក់ចុះទៅបាតទន្លេស្កាលខៀល (schuylKill) នាព្រឹកថ្ងៃទី២៨ សីហា ២០១៤ ។

ក្នុងការគេចខ្លួន តាំ មិន ឡៀ បាននាំប្រពន្ធនឹងកូនបីនាក់ អាយុពី ២ ទៅ ៥ឆ្នាំ ទៅជាមួយដើម្បីឱ្យរួចពីសំណាញ់ប៉ូលិស តាំ បានរត់ទៅជ្រកខ្លួនជាច្រើនកន្លែងច្រើនរដ្ឋក្នុងនោះ តាំ ធ្វើជាអ្នកបើកតាក់ស៊ីដោយឥតមានលិខិតអនុញ្ញាតឱ្យបើកបរទេ ប៉ុន្តែមិនមាននរណាដឹងថា តាំ ធ្វើបានដោយវិធីណាដើម្បីឱ្យបើកតាក់ស៊ីបាននោះទេ ។

កាលពីឆ្នាំ១៩៩៤ តាំ មិន ឡៀ បានជាប់ទាក់ទិននឹងរឿងឃាតកម្មមួយនៅញូយ៉កពេលនោះ តាំ បានទទួលទោស១២ឆ្នាំ ក្រោយមក តាំ បានរកស៊ីតាមសមាជីវោជាជាងជួសជុលគ្រឿងម៉ាស៊ីន ជាងធ្វើផ្ទះ ជួសជុលផ្ទះ ជាដើម ដោយហេតុស្ថានភាពរស់នៅក្នុងតំបន់ហ្គេងដែលមានឈ្មោះថា BTK Born To Kill តាំ នឹកឃើញស្រមោលអតីតកាល រួចក៏វិលចូលតាមគន្លងហ្គេង BTK សាជាថ្មីម្តងទៀត រហូតដល់បណ្តាលឱ្យមានការព្រាត់ប្រាស់គ្រួសារចោលកូនបីនាក់នៅវ័យក្មេងអាយុពី ២-៥ ឆ្នាំ ទុកឱ្យម្តាយចិញ្ចឹមតែម្នាក់ឯង ពុំដឹងជាអនាគតគ្នាក្លាយជាយ៉ាងណានៅឡើយ ។




ក្រុមប៉ូលិសបានធ្វើការស្រាវជ្រាវតាមចាប់ខ្លួន តាំមិន ឡៀ រហូតទៅដល់ម៉ូថែលលេខ៦ ទីក្រុង អែសឡិន Ashland VA រដ្ឋវើជីនា ។ ក្រុមប៉ូលិសបានចេញបញ្ជាឱ្យប្រពន្ធនឹងកូនដើរចេញពីម៉ូថែល រួចហើយប៉ូលិសក៏សម្រុកចូលទៅរុករកឃើញ តាំ នៅក្នុងបន្ទប់ទឹកកំពុងហែកជំបូលពិដានដើម្បីរត់គេចតទៅទៀត ប៉ុន្តែយឺតពេលសម្រាប់ តាំ ទៅហើយ ប៉ូលិសចាប់ខ្លួន តាំ បាននៅថ្ងៃ១៤មករា២០១៥ នេះ។

**ដកស្រង់ពី** Philly News &Democratan dchronide **នឹងសួរអ្នកជិតខាងនៅហ្វីឡា**

## តមកពីទំព័រទី ០៥ ដំណើរពីអាមេរិកទៅអាស៊ី...

ខ្ញុំស្លាប់ថ្ងៃជាមួយគ្នាដោយខំទៅរកជីកដំឡូងមកជូនម្ដាយពីសារបានដំឡូងខ្លះហើយតែដល់ត្រឡប់មកវិញ ប្រទះនឹងពួកឈ្លបឆ្មាំក្រហមមកដល់ជម្រកវិញម្ដាយក៏ផុតដង្ហើមស្លាប់ទៅហើយ ស្នែកឡើងប្អូនស្រីអាយុ២៥ឆ្នាំ ក៏បានស្លាប់ទៅហើយទៀតដែរ ដោយស្ដាយម្ដាយនឹងភិតភ័យពីឈ្លបដែលនឹងហៅយកទៅសម្លាប់ ពីព្រោះតែបានលួចជីកដំឡូងដែលទោះជានៅក្នុងព្រៃក៏ដោយក៏ជាសម្បត្តិអង្គការដែរ"។ ខ្ញុំនឹកដល់ប្អូនស្រីជីដូន "អាអូនទូច"ដែលបាននិយាយក្នុងសំបុត្រផ្ញើរមកដល់ខ្ញុំនិយាយពីព្រឹត្តិការនោះនៅ៥ឆ្នាំក្រោយពីរបបដ៏ព្រៃផ្សៃនោះរលំមកនៅពេលដែលមានដំណឹងច្បាស់លាស់ពីខ្ញុំពេលនោះនៅប្រទេសបារាំង



បន្តថា "នៅមុនពេលមកដល់មោងឫស្សីនេះ គឺធ្វើដំណើរដោយជើងទាំងបីនាក់អស់រយៈពេល១ខែ បន្ទាប់ពីឪពុកខ្ញុំស្លាប់នៅជើងភ្នំឯលិចខេត្តកំពង់ស្ពឺ ក្នុងស្ថានភាពខ្វះថ្នាំនឹងស្បៀងអាហារដូចម្ដាយខ្ញុំដែរ"។ ខ្ញុំមិនដឹងថា ហេតុអ្វីបានជាខ្ញុំនឹកទៅដល់រឿងរ៉ាវពី៤០ឆ្នាំមុននោះទេ តែរឿងនេះបានធ្វើឱ្យខ្ញុំស្ងប់ស្ងៀមបាត់មាត់ឈឹង រហូតដល់រថយន្តនាំយើងមកដល់ទីរួមខេត្តបាត់ដំបងដោយមិនដឹងខ្លួន។

នៅបាត្តំបងអ្នកទាំងអស់ស្នាក់នៅសណ្ឋាគារមួយតូចច្រឡឹងនៅមាត់ស្ទឹងសង្កែ ជាសំណង់ឆ្នាំ១៩០០ រចនាសារជាថ្មី តាមក្បាច់ជាផ្ទះជំនាន់អនានិគមបារាំង ល្វែងខាងក្រោយជាសំណង់ថ្មីមានទីធ្លាទទួលភ្ញៀវសមរម្យនឹងអាងហែលទឹកកំសាន្តមួយនៅធ្លាខាងក្រោយបង្អស់ គឺនៅសណ្ឋាគារដែលមានប្រវត្តិជាទីបញ្ជាការបារាំងកាលពីសម័យអានានិគមបន្ទាប់មកជាទីបញ្ជាការទ័ពខ្មែរក្រហមជំនាន់កម្ពុជាប្រជាធិបតេយ្យ ក្រោយមកក៏ក្លាយជាទីបញ្ជាការទ័ពវៀតណាមទៀត គឺទីនោះហើយដែលម្ដាយមីរ៉ាជីបានជួលផ្ដាច់មុខសម្រាប់ថ្ងៃការកូនស្រីរបស់គេ ។

អ្នកស្រី កូរីន ជានាយកគ្រប់គ្រងសណ្ឋាគារនឹងជាមិត្តជាតិបារាំងដ៏ជិតស្និតរបស់ស៊ីរីយ៉ាបានក្លាយទៅជាពិធីករនៃកម្មវិធីមង្គលការមីរ៉ាជី នឹងជើរ ពេញមួយថ្ងៃដែលផ្ដើមឡើងតាំងពីព្រលឹមស្រាងៗជាមួយនឹងភ្លេងការដ៏ជំនាញមួយវង្សនឹងអាចារ្យដ៏ចំណាប់ម្នាក់ជាអ្នកប្រារព្ធពិធី ។ អាចារ្យនោះបានរៀបពិធីជាច្រើនតាមប្រពៃណីខ្មែរនៅមុខក្រុមគ្រួសារដែលជាងពាក់កណ្ដាលមានដើមកំណើតជាបារាំង មានជាអាចិហែរជំនូនសូត្រមន្តផ្ចឹមចងដៃ បង្វិលពពិល កាត់សក់ចុងបញ្ចប់ជប់លៀង រហូតដល់ពាក់កណ្ដាលអាធ្រាតទើបចប់ ។ ទាំងស៊ីរីយាជាម្ដាយនឹងខ្ញុំជាឪពុកមានសេចក្ដីត្រេកអរណាស់ ដែលបានឃើញកូនរៀបការតាមប្រពៃណីខ្មែរជាលើកដំបូងនឹងបានឃើញកូនមានជោគជ័យយ៉ាងមាំទាំក្នុងជីវិតគ្រួសារខ្លួនរីឯអ្នកឯទៀតវិញ រាប់ទាំងសូបិននិងប៉ុណ្ណារ៉ូផងក៏រីករាយខ្លាំងណាស់ដែរ ដោយសារពិធីមង្គលការនេះជាបុព្វហេតុនៃដំណើរមកកម្ពុជារបស់

តទៅទំព័រទី ១៩

ឌី ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌី ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ព្រហស្បតិ៍ ទី០៨ ខែមករា ឆ្នាំ២០១៤

## លោក ប៉ែន សុវណ្ណ គ្រោងប្ដឹងប្រទេសវៀតណាមជុំវិញ "ថ្ងៃ៧មករា" ទៅតុលាការឧក្រិដ្ឋកម្មអន្តរជាតិ ICC

**ដោយ គុជ ណារ៉េន** | JANUARY 11, 2015

លោក ប៉ែន សុវណ្ណ អតីតនាយករដ្ឋមន្ត្រីកម្ពុជាដែលត្រូវបានលើកបន្តុបដោយវៀតណាមបន្ទាប់ពីពួកគេផ្ដួលរំលំរបបខ្មែរក្រហម ប៉ុន្តែដែលក្រោយមកត្រូវបានដកចេញពីតំណែងវិញ និងឃុំខ្លួននៅក្នុងប្រទេសវៀតណាមនោះ បានប្រកាសផែនការដាក់ពាក្យប្ដឹងប្រទេសជិតខាងភាគខាងកើតរបស់កម្ពុជាមួយនេះទៅតុលាការឧក្រិដ្ឋកម្មអន្តរជាតិ ICC ។

លោក ប៉ែន សុវណ្ណ ដែលពេលនេះជាតំណាងរាស្ត្រគណបក្សសង្គ្រោះជាតិបានមានប្រសាសន៍កាលពីថ្ងៃសុក្រថា លោកនឹងដាក់ពាក្យបណ្ដឹងនេះនៅដើមឆ្នាំនេះ ដោយទទួលបានជំនួយហិរញ្ញវត្ថុពីពលរដ្ឋខ្មែរមិនបញ្ចេញឈ្មោះរស់នៅក្នុងប្រទេសអូស្ត្រាលីដែលនឹងផ្ដល់ថវិកាដល់លោកសម្រាប់ជួលមេធាវីបរទេស ។

លោកបានមានប្រសាសន៍ថា សំណុំរឿងនេះនឹងផ្ដោតលើការឈ្លានពានរបស់វៀតណាមចូលមកក្នុងទឹកដីកម្ពុជាដែលបានឈានទៅដល់ការបណ្ដេញរបបខ្មែរក្រហមចេញពីអំណាចនៅថ្ងៃ៧មករា ឆ្នាំ១៩៧៩។

លោកបានលើកឡើងថា "ជាការពិតខ្ញុំនឹងដាក់ពាក្យប្ដឹងរដ្ឋាភិបាលវៀតណាមជុំវិញថ្ងៃ៧មករា ឆ្នាំ១៩៧៩ ពីព្រោះវៀតណាមអះអាងថា ពួកគេបានមកជួយកម្ពុជា ប៉ុន្តែ ធាតុពិតពួកគេមានបំណងអាក្រក់ដើម្បីលេបត្របាក់ទឹកដីកម្ពុជា" ។

លោក ប៉ែន សុវណ្ណ ខ្លួនឯង គឺជាមនុស្សម្នាក់ស្ថិតក្នុងចំណោមអតីតជនកុម្មុយនិស្តខ្មែរមួយក្រុមដែលបានភៀសខ្លួនចេញពីកម្ពុជា បន្ទាប់ពីខកចិត្តចំពោះខ្មែរក្រហម ហើយក្រោយមកបានវិលត្រឡប់មកវិញនៅមុនពេលឈ្លានពានរបស់អាជ្ញាធរវៀតណាមដែលបានផ្ដួលរំលំរបប ប៉ុល ពត ។ លោកគឺជានាយករដ្ឋមន្ត្រីទី១ប្រចាំប្រ-ទេសកម្ពុជាក្រោយរបបខ្មែរក្រហម ប៉ុន្តែត្រូវបានវៀតណាមដកចេញពីអំណាចទាំងបង្ខិតបង្ខំនៅចុងឆ្នាំ១៩៨១ដោយសារតែលោកបានអំពាវនាវឱ្យដកកងទ័ពវៀតណាមចេញពីប្រទេសកម្ពុជា។

លោកបានមានប្រសាសន៍កាលពីថ្ងៃសុក្រថា លោកនឹងលើកយកមកធ្វើជាភ័ស្តុតាងបង្ហាញពីចេតនាក្រក់របស់វៀតណាម ដូចជាការចាប់ខ្លួនលោកព្រមទាំងយុទ្ធនាការក៥ដ៏មហន្តរាយដែលធ្វើឱ្យប្រជាពលរដ្ឋរាប់ពាន់នាក់បាត់បង់ជីវិត ខណៈពេលត្រូវគេបញ្ជូនឱ្យទៅជំនួយដល់កម្លាំងទ័ពនៅព្រំដែនថៃ ដើម្បីទប់ទល់ជាមួយខ្មែរក្រហមនៅពាក់កណ្ដាលទសវត្សរ៍ឆ្នាំ១៩៨០ ។

លោកបានបន្តថា "រដ្ឋាភិបាលវៀតណាមបានកាឡៃប្រវត្តិសាស្ត្រជុំវិញថ្ងៃ៧មករាឆ្នាំ១៩៧៩ ហើយរដ្ឋាភិបាលវៀតណាមបានឃុំខ្លួនខ្ញុំនៅភាគខាងលិចទីក្រុងហាណូយអស់១០ឆ្នាំ និង៥២ថ្ងៃ មុនពេលខ្ញុំត្រូវបានដោះលែងដោយកិច្ចព្រមព្រៀងទីក្រុងប៉ារីសថ្ងៃ២៣ តុលា" ។

ស្ថានទូតវៀតណាមមិនអាចទាក់ទងសុំការបំភ្លឺបានទេពាក់ព័ន្ធនឹងបញ្ហានេះ ៕ **សុខុម**

## Pen Sovann plans to sue the country around, "January 7" to criminal court ICC International

**KUCH NAREN | JANUARY 11, 2015**

Pen Sovann, a former prime minister who was installed by the Vietnamese after they toppled the Khmer Rouge regime, but that was later removed from office and detained in Vietnam announced plans to file a complaint eastern neighbors Cambodia to the International Criminal Court, ICC.

Be Sovan this parliamentary party has said On Friday he will file a complaint at the beginning of the year This received financial support from the Khmer citizens not to living in Australia, which will fund to hire a foreign lawyer.

He said the case will focus on the invasion Vietnam into Cambodian territory to reach The expulsion of the Khmer Rouge regime from power on January 7 1979.

He said, "Of course I'm going to file a complaint Vietnamese government around January 7, 1979, because it claims They came to help, but in fact they are willing to worse to devour the land. "

Pen Sovann itself is one among the former Communist Khmer refugees from Cambodia After the disappointment of the Khmer Rouge and then returned aggressive back before the award of the Vietnamese authorities toppled the regime of Pol Pot. He is the 1st Prime Minister of Cambodia after the Khmer red, but Vietnam was removed from power and coercion the end of 1981 because he had called for the withdrawal of Vietnamese troops from Cambodia.

He had said on Friday that he would take to be evidence of intent Vietnam arrest campaign, as well as devastating 5 Thousands of people lost their lives while were sent to aid the forces at the border Thailand to counter with the Khmer Rouge in the mid 1980s.

He said that "the government has historical distortion around the 7th day January 1979, the government detained In the west of Hanoi for 10 years and 52 days before I was released by the agreement the city of Paris, 23 October ".

Vietnamese Embassy could not be reached for comment relevant to the problem. welfare

## ប៉ូលិសរារាំងការប្រារព្ធខួបនៃការផ្ទុះអំពើហិង្សាស្លាប់និងរបួសនៅផ្លូវវេងស្រែង

**ដោយ មិច ដារ៉ា** | JANUARY 5, 2015

ព្រះសង្ឃ កម្មករ និងសកម្មជនប្រហែល ៣០០អង្គ និងនាក់ ត្រូវបានគេរាំងមិនឱ្យដើរហែតាមបណ្ដោយផ្លូវ វេង ស្រែង កាលពីថ្ងៃសៅរ៍ ដើម្បីរំឭកការសម្លាប់កម្មករដែលធ្វើកូដកម្មប្រាំនាក់នៅទីនោះ ដោយកងរាជអាវុធហត្ថកាលពីមួយឆ្នាំមុននេះ។

ដោយកាន់ទង់ជាតិខ្មែរនិងទង់ជាតិសាសនា អ្នកហែក្បួនបានចេញដើរដើម្បីរំឭកថ្ងៃដែលកងកម្លាំងរាជអាវុធហត្ថប្រដាប់ដោយកាំភ្លើងអាកា-៤៧ បានដាក់វាយកម្លាំងត្រៀបត្រានៅជាយក្រុងតំបន់ឧស្សាហកម្មដ៏ហុយរបស់ទីក្រុង ដើម្បីបង្ក្រាបកូដកម្មទូទាំងប្រទេសរបស់កម្មករកាត់ដេរ ។

ដឹកនាំដោយព្រះសង្ឃនិងសមាជិកសភាគណបក្សសង្គ្រោះជាតិ លោក រៀល ខេមរិន្ទ្រ នោះ ក្រុមនេះបានចាប់ផ្ដើមចេញដំណើរតាមបណ្ដោយផ្លូវនេះ មុនពេលពួកគេបានជួបទិដ្ឋភាពស្រដៀងគ្នាក្នុងខណៈដែលកម្លាំងរាជអាវុធហត្ថរាប់រយនាក់កាន់កាំភ្លើងអាកា-៤៧ឈរជាជួររាំងផ្លូវ ។

លោក រ័ត្ន ស្រ៊ាង មេបញ្ជាការកងរាជអាវុធហត្ថរាជធានីភ្នំពេញដែលកាលពីឆ្នាំមុនបានបញ្ជាដោយផ្ទាល់ឱ្យបង្ក្រាបកូដកម្មជាថ្មីម្ដងទៀតបានមានវត្តមាន **តទៅទំព័រទី ១៣**

## Police prevented the celebration of the anniversary of the outbreak of violence killed and injured in road VengSreng

**MECH DARA | JANUARY 5, 2015**

Monks and workers and about 300 activists were prevented from march along the road VengSreng on Saturday to commemorate the killing of Five workers strike there by military weapon signed a year ago.

Led by Buddhist monks and members of the National Party Congress Realty khemrint team has started off along the way before they met a similar view, while hundreds of police AK -47 lined block.

Srieng military police commander capital, which last year ordered directly suppress strikes again present At the scene, the driver.

When the march was trying to avoid police on a major road, the commander grab your flag Some rules and grabbed a microphone.

Major General Srieng shouted through loudspeakers, "When you break the law, the authorities have the right to maintain public order. City Hall does not allow you to do a [marching], so you have to break. "

Angered by and shown in the video that is delivered widely through social media, Major General Srieng That pushed the woman who had criticized his actions.

Major General Srieng said to her, "Do not argue! My rights! ". Commander, then turned to a monk next to him and threatened to arrest him. He said, "If the monk does not break, I'll take Venerable because Buddhist monk who led the march."

The marchers were not pushed through police lines and suddenly split when the forces of General Srieng control tuk tuk car and drive through the city.

When asked why the force armed with AK -47 was sent marches, military police spokesman Kheng Tito said On Sunday, it's simple.

Brigadier General Kheng Tito said, "It is not unusual tbetei 'armed forces' are equipped with weapons and so.""We use a weapon to protect the lives of the people, including those who are march, too."

At its office in Phnom Penh in height, **Continued to Page 13**

ឌី ខេមបូឌា ដេលី The Cambodia Daily

ដំណឹងបកប្រែសង្ខេបពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌី ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ព្រហស្បតិ៍ ទី០៨ ខែមករា ឆ្នាំ២០១៤

# គណបក្សប្រជាជនកម្ពុជារំឭកខួប៣៦ឆ្នាំចាប់តាំងពីវៀតណាម បានបណ្ដេញ ប៉ុល ពត

**ដោយ ហ៊ុល រស្មី** | JANUARY 8, 2015

កាលពីម្សិលមិញ លោក ហេង សំរិន ប្រធានរដ្ឋសភាបានដឹកនាំការប្រារព្ធពិធីរំឭកខួបលើកទី៣៦នៃថ្ងៃដែលកងទ័ពវៀតណាម និងអ្នកផ្ដាច់ខ្លួនខ្មែរក្រហមមួយក្រុមផ្ដួលរំលំរបប ប៉ុល ពត ហើយបានបង្កើតសាធារណរដ្ឋប្រជាមានិតកម្ពុជា។

លោក ហេង សំរិន ដែលវៀតណាមបានលើកបន្តុបជាប្រមុខរដ្ឋក្នុងឆ្នាំ១៩៧៩ បានចូលរួមជាមួយថ្នាក់ដឹកនាំគណបក្សកាន់អំណាចដទៃទៀតដែលបានឡើងកាន់អំណាចក្រោមរបបថ្មីនោះ រួមមានលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ជាដើម។

ទោះជាយ៉ាងណា លោក ជា ស៊ីម ប្រធានគណបក្សប្រជាជនកម្ពុជាបានអវត្តមានពីពិធីនោះ ដែលតាមទម្លាប់លោកបានចូលរួមជាអធិបតីដែរ។ លោក ជា ស៊ីម អាយុ៨២ឆ្នាំ មានបញ្ហាសុខភាពរយៈពេលច្រើនឆ្នាំមកហើយ។

ក្រុមមន្ត្រីគណបក្សប្រជាជនកម្ពុជាមិនអាចទាក់ទងសុំអត្ថាធិប្បាយបានទេអំពីអវត្តមានមេដឹកនាំគណបក្សរបស់ខ្លួន ប៉ុន្តែលោក ញឹក ប៊ុនឆៃ អគ្គលេខាធិការគណបក្សហ៊្វុនស៊ិនប៉ិចដែលបានចូលរួមក្នុងពិធីនោះដែរបានមានប្រសាសន៍ថា លោក ជា ស៊ីម "មិនទាន់មានសុខភាពមាំទាំ" អាចចូលរួមបានឡើយ។ លោកបានមានប្រសាសន៍ថា "លោកមានជំងឺ ហើយវាលំបាកសម្រាប់លោកក្នុងការអានសុន្ទរកថាណាស់"។

លោក ញឹក ប៊ុនឆៃ ដែលឥឡូវនេះជាទីប្រឹក្សារដ្ឋាភិបាលមានឋានៈស្មើឧបនាយករដ្ឋមន្ត្រី ជាឧត្តមសេនីយ៍យោធាម្នាក់ក្នុងចំណោមឧត្តមសេនីយ៍យោធាកំពូលៗរបស់គណបក្សហ៊្វុនស៊ិនប៉ិចអំឡុងសង្គ្រាមស៊ីវិលក្នុងទសវត្សរ៍ឆ្នាំ១៩៨០ នៅពេលគណបក្សនេះមានសម្ពន្ធភាពជាមួយខ្មែរក្រហមក្នុងការវាយប្រហារការកាន់កាប់របស់វៀតណាម។ **តទៅទំព័រទី ១៧**

## The Cambodian People's Party 36-year anniversary since the Vietnam ousted Pol Pot

**HUL RAY | JANUARY 8, 2015**

Yesterday, National Assembly President Heng Samrin, led the celebrations commemorating the 36 th anniversary of the Vietnamese army and Khmer Rouge, a separatist group toppled Pol Pot regime and established the People's Republic.

Heng Samrin Vietnam was installed as head of state in 1979, joined other leaders of the ruling party who came to power under the new regime, including Prime Minister Hun Sen said.

However, Chea Sim, president of the Cambodian People's Party _pou was absent from the ceremony, which he attended as a routine presided. Chea Sim, 82 years old, had health problems for several years.

CPP officials could not be reached for comment about the absence of his party leader, but Bun Chhay, secretary general of the party hvo Funcinpec who attended the event, said that he "does not exist in stable health". He said " He was sick and it was difficult for him to read the speech. "

Bun Chhay, who is now a government adviser with the rank of deputy prime minister, military generals among top military generals hvo party Funcinpec during the civil war in the 1980s, when the party has a covenant with the Khmer Rouge in the attacks of holdings Vietnam.

In the 1990s royalist powerful protest against the day a national holiday . And even in 2004, Mr. Bun Chhay said he considers January 7 a "day when Vietnam invaded Cambodia."

However, yesterday he attended a memorial with the CPP and flowers Heng Samrin and Hun Sen.

Bun Chhay said after the ceremony, "I know that Vietnam has to attack and change toppled **Continued to Page 17**

តមកពីទំព័រទី ១២

# ប៉ូលិសរារាំងការប្រារព្ធខួបនៃការ...

នៅកន្លែងកើតហេតុនោះបញ្ជាកម្លាំង។

ពេលដែលអ្នកដើរហែបានព្យាយាមដើរចៀសជួរប៉ូលិសលើផ្លូវដ៏ធំមេបញ្ជាការរូបនេះបានដណ្ដើមយកទង់របស់អ្នកដើរក្បួនមួយចំនួន និងបានកញ្ឆក់យកឧគ្ឃោសនសព្ទមួយ។

ឧត្តមសេនីយ៍ទោ រ័ត្ន ស្រ៊ាង បានស្រែកតាមឧគ្ឃោសនសព្ទថា "នៅពេលណាអ្នករំលោភច្បាប់អាជ្ញាធរមានសិទ្ធិថែរក្សាសណ្ដាប់ធ្នាប់សាធារណៈ។ សាលាក្រុងមិនអនុញ្ញាតឱ្យអ្នកធ្វើការឱ្យដើរក្បួនឧនេះទេ ហេតុដូច្នេះអ្នកត្រូវតែបំបែកគ្នា"។

ដោយមានកំហឹង និងបង្ហាញក្នុងរូបភាពវីដេអូដែលត្រូវគេបញ្ជូនតគ្នាយ៉ាងទូលំទូលាយតាមបណ្ដាញព័ត៌មានសង្គមនោះ ឧត្តមសេនីយ៍ទោ រ័ត្ន ស្រ៊ាង ពេលនោះបានរុញនារីម្នាក់ដែលបានរិះគន់សកម្មភាពរបស់លោក។

ឧត្តមសេនីយ៍ទោ រ័ត្ន ស្រ៊ាង បាននិយាយទៅកាន់នាងថា "កុំតវ៉ា! ជាសិទ្ធិរបស់ខ្ញុំ!"។ មេបញ្ជាការរូបនេះ បន្ទាប់មកបានបែរទៅរកព្រះសង្ឃមួយអង្គនៅក្បែរគាត់ និងបានគំរាមចាប់ព្រះអង្គ។ លោកបាននិយាយថា "ប្រសិនបើព្រះតេជគុណមិនបំបែកគ្នាទេ ខ្ញុំនឹងយកព្រះតេជគុណទៅ ពីព្រោះព្រះតេជគុណជាអ្នកដែលដឹកនាំការដើរក្បួននេះ"។

អ្នកដើរក្បួនមិនបានរុលឆ្លងកាត់ជួរប៉ូលិសទេ ហើយភ្លាមនោះក៏បានបំបែកគ្នានៅពេលដែលកម្លាំងរបស់ឧត្តមសេនីយ៍ទោ រ័ត្ន ស្រ៊ាង ត្រួតពិនិត្យម៉ូតូរ៉ឺម៉ក និងរថយន្តដែលបើកកាត់ចូលទីក្រុង។

នៅពេលសួរថាហេតុអ្វីកម្លាំងប្រដាប់ដោយកាំភ្លើងអាកា-៤៧ត្រូវបញ្ជូនមកកន្លែងហែក្បួននេះ អ្នកនាំពាក្យកងរាជអាវុធហត្ថ លោក ខេង ទិត្យ បាននិយាយកាលពីថ្ងៃអាទិត្យថា វាជារឿងធម្មតា។

ឧត្តមសេនីយ៍ត្រី ខេង ទិត្យ បាននិយាយថា "ជាការធម្មតាទេ ត្បិតអីកម្លាំងប្រដាប់អាវុធត្រូវបំពាក់ដោយអាវុធអ៊ីចឹងហើយ"។ "យើងប្រើអាវុធដើម្បីការពារអាយុជីវិតរបស់ប្រជាជនក្នុងនោះមានទាំងអ្នកដែលកំពុងដើរហែផងដែរ"។

នៅឯការិយាល័យក្នុងក្រុងភ្នំពេញរបស់ខ្លួនឯងនោះវិញ កាលពីថ្ងៃអាទិត្យគណបក្សសង្គ្រោះជាតិបានធ្វើពិធីរបស់ខ្លួនផ្ទាល់ដើម្បីរំឭកដល់ការសម្លាប់នេះ បន្ទាប់ពីត្រូវបានហាមឃាត់មិនឱ្យធ្វើពិធីរំឭកនេះនៅទីលានប្រជាធិបតេយ្យ។

សាលាក្រុងបានចេញសេចក្ដីជូនដំណឹងថា ការអនុញ្ញាតឱ្យធ្វើពិធីនេះត្រូវបានបដិសេធចោលវិញ **តទៅទំព័រទី១៥**

**Continued from page 12**

# Police prevented the celebration of the anniversary

on Sunday the rescue party made its own to commemorate the killing of After being forbidden to celebrate at Freedom Park.

City Hall issued a notice that the permit was rejected because it is a religious ceremony and therefore should to do in the compound.

City Hall, said, "The Freedom to make this seems to mean that the rescue party is trying to take advantage political business through inciting unrest and undermine security and stability. "

During the ceremony, Paul Abraham, Acting President of the National Salvation Party, which is leading the party when the leader of the opposition Sam Rainsy Party and Vice President Kem Sokha Overseas, she mocked the ban at Freedom Park.

He said, "I'm sorry, Mr. Mayor [Socheatvong]." Talk frankly incompetent and were afraid of the shadows. What we can do? We just want incenses dedicated. "

Kong supporters of opposition leader Sam Rainsy also spoke at the event, with critical information that Samdech Krom Preah Norodom Ranariddh returned FUNCINPEC led Funcinpec Eight years after being ousted from the royalist party, which is deteriorating.

By criticizing the party that supported the 2005 border treaty with Vietnam controversial Kong fans said, "Today they Funcinpec has tried to strengthen Funcinpec. Vain. People no longer trust FUNCINPEC Funcinpec and now they trusted party ".

Compare between the treaty and the occupation Crimean region's armed with Russian President Vladimir Putin last year, he "FUNCINPEC Funcinpec had made a big mistake."

Kong fans said, "Now you hear about Putin use force its Crimean region, and it is the same as what happens in the country. Cambodia is the Crimean so because today the country under the influence of Vietnam since 2005 ".

Kong fans who used to be an adviser to Hun Sen at the State Department in the 1980s, said that "the country remains a [country] January 7, Vietnam. "Republic






# ប្រអប់ខ្មៅទិន្នន័យនៃយន្តហោះ QZ8501 ត្រូវបានរកឃើញ

**ដកស្រង់ដោយខ្មែរផុស ស.រ.អា**

ក្រុមអ្នកជំនាញមុជទឹកប្រមាណជាង៨០នាក់បានស្វែងរកឃើញប្រអប់ទិន្នន័យនៃយន្តហោះ QZ8501 របស់ក្រុមហ៊ុនអាកាសចរណ៍ (Air Asia) អែអេសៀ ដែលបានលិចក្នុងបាតសមុទ្រ ប្រទេសឥណ្ឌូនេស៊ី កាលពីថ្ងៃទី២៨ វិច្ឆិកា កន្លងមកបានបណ្តាលមនុស្ស១៦២នាក់ស្លាប់ ។







បន្ទាប់មកពួកគេក៏បានរកឃើញប្រដាប់ថតសម្លេងក្នុងបន្ទប់អ្នកបើកយន្តហោះផងដែរ ។ ការរកឃើញប្រដាប់ថតម្លេងជើងហោះហើរនេះ ពួកគេសង្ឃឹមថា នឹងស្រាវជ្រាវដឹងនូវការពិតថា : តើព្រោះហេតុអ្វីទើបបណ្តាលឱ្យយន្តហោះនោះធ្លាក់ ។ មកទល់ពេលនេះ គេបានរកឃើញសាកសពចំនួន៤៨នាក់ហើយ ឯកឧត្តម មូអែលដូកូ (Gen Moeldoko) អគ្គសេនាធិការកងទ័ពបានមានប្រសាសន៍ថា : ខ្ញុំជឿថានឹងមានសាកសពជាច្រើនទៀតដែលសង្កត់ជាប់ក្រោមបាតសមុទ្រ ពួកខ្ញុំនឹងមានភារកិច្ចស្វែងរកតទៅទៀត ៕

## តមកពីទំព័រទី ០៣ ស្វាគមន៍ព្រះអង្គម្ចាស់ស៊ីសុវត្ថិ...

ឬរាស្ត្រសុទ្ធតែប្រាថ្នានូវសេរីភាព យុត្តិធម៌ មានជីវិតរស់នៅជាមួយគ្រួសារថ្លៃថ្នូស្មើភាពគ្នា ពួតដៃគ្នាការពារជាតិរបស់ខ្លួនលើកតម្កើងឱ្យបានថ្កុំថ្កើងទៅបាន... គឺប្រាកដជាទីនេះហើយដែលអ្នកនយោបាយឆ្នើមដោយភាពសុច្ចរិតទៀងត្រង់មានបញ្ញាឈ្លាសវៃទាំងអស់អាចចូលរួមធ្វើការយ៉ាងកក់ក្ដៅនឹងប្រកបដោយក្ដីសង្ឃឹមខ្ពស់ ដើម្បីប្រជាជាតិខ្លួនបាន... ទំនងជាព្រះអង្គម្ចាស់ ធម្មិកោ បានសម្លឹងឃើញច្រកនៃពន្លឺនោះហើយ ៕

**សូមស្វាគមន៍ព្រះអង្គម្ចាស់ ធម្មិកោ នាទីក្រុងឡូវែល !**

## តមកពីទំព័រទី ០១ គណបក្សហ៊្វុនស៊ិនប៉ិចត្រៀម...

សមាសភាពនេះ បញ្ជាក់ថាគណបក្សនរោត្តម រណឫទ្ធិ បានត្រូវរំលាយចោល រីឯគណបក្សហ៊្វុនស៊ិនប៉ិចបានត្រូវរៀបចំបញ្ចូលគ្នាឡើងវិញ ដើម្បីចូលរួមប្រកួតយកសន្លឹកឆ្នោតនាឆ្នាំ២០១៨ ដោយប្រើកេរ្តិ៍ឈ្មោះអតីតព្រះមហាក្សត្រនរោត្តម សីហនុ ឡើងវិញ ។ ការរួមបញ្ចូលគ្នាដ៏ងាយស្រួលយ៉ាងនេះ ក៏ដោយសារស្នាដៃបញ្ចុះបញ្ចូលរបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ដែលត្រូវការឱ្យមានគណបក្សប្រឆាំងដ៏មានកម្លាំងឱ្យបានច្រើន ។


សមាជគណបក្សហ៊្វុនស៊ិចប៉ិចឆ្នាំ២០១៥

អ្នកវិភាគជាច្រើនបានវាយតម្លៃថា ប្រជាប្រិយភាពរបស់ទ្រង់ រណឫទ្ធិ បានធ្លាក់ចុះអស់ទៅហើយពុំអាចស្រោចស្រង់បានទៀតទេ ៕

## តមកពីទំព័រទី ១៣ ប៉ូលិសរារាំងការប្រារព្ធខួបនៃការ...

ពីព្រោះវាជាពិធីសាសនា ហេតុដូច្នេះហើយគួរត្រូវធ្វើនៅក្នុងទីបរិវេណវត្តវិញ ។

សាលាក្រុងបានឱ្យដឹងថា "ការប្រើទីលានប្រជាធិបតេយ្យដើម្បីធ្វើពិធីនេះ ហាក់មានន័យថា គណបក្សសង្គ្រោះជាតិកំពុងព្យាយាមយកចំណេញដោយធ្វើអាជីវកម្មនយោបាយតាមរយៈការញុះញង់ការបង្កចលាចល ហើយធ្វើឱ្យប៉ះពាល់ដល់សន្តិសុខនិងស្ថិរភាព" ។

ក្នុងពិធីនោះ លោក ប៉ុល ហំម ប្រធានស្ដីទីគណបក្សសង្គ្រោះជាតិដែលកំពុងដឹកនាំបក្សនៅពេលដែលមេដឹកនាំបក្សប្រឆាំង លោក សម រង្ស៊ី និងអនុប្រធានបក្ស លោក កឹម សុខា ស្ថិតនៅក្រៅប្រទេសនោះ បានចំអកចំពោះបម្រាមហាមពិធីនៅទីលានប្រជាធិបតេយ្យ ។

លោកបាននិយាយថា "ខ្ញុំសូមទោសលោកអភិបាលក្រុងឱ្យ ប៉ា សុជាតិវង្ស" ។ និយាយដោយស្មោះត្រង់ទៅលោកគ្មានសមត្ថភាព ហើយលោកខ្លាចស្រមោល ។ តើអ្វីដែលយើងអាចធ្វើបាននោះ? យើងគ្រាន់តែចង់អុជធូបឧទ្ទិសប៉ុណ្ណោះ" ។

លោក គង់ គាំ ប្រធានគណបក្ស សម រង្ស៊ី ក៏បានថ្លែងក្នុងពិធីនោះដែរ ដោយរិះគន់ព័ត៌មានដែលថា សម្ដេចក្រុមព្រះនរោត្តម រណឫទ្ធិ នឹងយាងត្រឡប់មកដឹកនាំហ៊្វុនស៊ិនប៉ិចវិញ ប្រាំបីឆ្នាំបន្ទាប់ពីត្រូវបានបណ្ដេញចេញពីគណបក្សរាជានិយមដែលកំពុងដុនដាបមួយនេះ ។

ដោយរិះគន់គណបក្សនេះព្រោះបានគាំទ្រសន្ធិសញ្ញាព្រំដែនឆ្នាំ២០០៥ដ៏ចម្រូងចម្រាសជាមួយប្រទេសវៀតណាមនោះ លោក គង់ គាំ បាននិយាយថា "ថ្ងៃនេះពួកគេបានព្យាយាមពង្រឹងហ៊្វុនស៊ិនប៉ិច ។ ឥតប្រយោជន៍ទេ ។ ប្រជាពលរដ្ឋលែងទុកចិត្តហ៊្វុនស៊ិនប៉ិចទៀតហើយ ឥឡូវនេះពួកគេទុកចិត្តតែគណបក្សសង្គ្រោះជាតិប៉ុណ្ណោះ" ។

ដោយលើកបង្ហាញប្រដូចរវាងសន្ធិសញ្ញានេះ និងការចូលកាន់កាប់តំបន់គ្រីមៀដោយប្រដាប់អាវុធរបស់ប្រធានាធិបតីរុស្ស៊ី លោក វ្លាឌីមៀ ពូទីន កាលពីឆ្នាំមុននោះ លោកបាននិយាយថា "ហ៊្វុនស៊ិនប៉ិចបានធ្វើកំហុសដ៏ធំមួយ" ។

លោក គង់ គាំ បាននិយាយថា "ឥឡូវនេះអ្នកឮអំពីលោក ពូទីន ប្រើកម្លាំងរបស់ខ្លួនយកតំបន់គ្រីមៀ ហើយវាដូចគ្នានឹងអ្វីដែលកើតឡើងនៅប្រទេសកម្ពុជា ។ ប្រទេសកម្ពុជាគឺដូចគ្រីមៀអីចឹង ពីព្រោះសព្វថ្ងៃនេះ ប្រទេសកម្ពុជាស្ថិតក្រោមឥទ្ធិពលរបស់ប្រទេសវៀតណាមដោយសារសន្ធិសញ្ញាឆ្នាំ២០០៥" ។

លោក គង់ គាំ ដែលធ្លាប់ធ្វើជាទីប្រឹក្សារបស់លោក ហ៊ុន សែន នៅក្រសួងការបរទេសក្នុងទសវត្សរ៍ឆ្នាំ១៩៨០ បាននិយាយថា "ប្រទេសកម្ពុជានៅតែជាឱ្យប្រទេសឧពុកមករារបស់ប្រទេសវៀតណាម" ៕

**មានិត**

## តមកទំព័រទី ៣ មើលត្រឡប់ទៅឆ្នាំ២០១៤...

-សមាគមខ្មែរបានប្រារព្ធខួបទី៣០របស់សមាគមនៅឡូវែល

-នៅខែឧសភា អភិបាលរដ្ឋ ផាទ្រីក បានមកឡូវែលដើម្បីប្រកាស "ខ្មែរនៃកេរ្តិ៍ដំណែលវប្បធម៌ជនជាតិអាស៊ីន-អាមេរិកាំង" ហើយ ប៊ីលណេ អ្នកវិទ្យាសាស្ត្រ ក៏បានមកឧទ្ទិសនាមនៅសាកលវិទ្យាល័យឡូវែលរដ្ឋម៉ាសាឈូសិតដែរ ។

ចុះចំណែកឆ្នាំ២០១៥វិញ? តើឆ្នាំថ្មីនឹងនាំអ្វីខ្លះមកឱ្យនយោបាយឡូវែល? ការបោះឆ្នោតនៅខែវិច្ឆិការ នឹងសម្រេចថា នរណានឹងទៅបំរើនៅក្រុមប្រឹក្សាក្រុងហ្នឹង នៅគណកម្មការសាលារៀន ។ ខ្ញុំបានឮថា នឹងមានឈ្មោះខ្មែរនៅឡូវែល ៣នាក់ ដែលកំពុងគិតពីការឈរឈ្មោះនេះ ពីព្រោះអ្នកបោះឆ្នោតអាចបោះឱ្យ៩នាក់ មិនមែនបោះឱ្យតែម្នាក់ទេ...មានបេក្ខជនច្រើនរូបឈរឈ្មោះពីសហគមន៍ខ្មែរអាចនឹងជួយបានដល់ទាំងអស់គ្នាត្រឡប់មកខែតុលាវិញ អភិបាលរដ្ឋ ផាទ្រីក បានបញ្ចេញថវិកា១៥លានដុល្លារ សម្រាប់សាលាក្រុងកែរលំអតំបន់"ឡដអូវ៉ែរផាស" នឹងផ្លូវ"ធនដាយក៏" ។ នៅឆ្នាំ២០១៥នេះ សាលាក្រុងនឹងសម្រេចយកគំរុណាមួយសម្រាប់ផ្លូវទាំងនោះ ដោយសង្ឃឹមថា គ្រោងនោះអាចនឹងសម្រួលដំណើរពីក្រុងខ្មែរ ពី"ហាយឡិន" នឹងពីតំបន់ "អែគឺ"ទៅកាន់កណ្តាលក្រុង នឹងទៅកាន់សង្កាត់ "ហាមិលថុនកាណាល់"ប្រសើជាងមុន ។ ទាំងនេះប្រាកដជាអាចជួយដល់អ្នករស់នៅនឹងពាណិជ្ជករក្នុងភូមិករបាន ៕

**Continued from page 03**

# Looking Back at 2014

in Lowell politics? The city election in November will decide who will serve on the city council and the school committee. I have already heard the name of three Cambodian residents of Lowell who are thinking about running for city council. Because voters can vote for nine councilors and not just one, having several candidates from the Cambodian community could help them all.

Back in October, Governor Patrick delivered $15 million to the city to be used for improving the Lord Overpass and Thorndike Street. In 2015, the city will select a new design for these roadways. Hopefully it will make it easier to get from Cambodia Town, the lower Highlands and the Acre to downtown Lowell and the Hamilton Canal District. This would be a great help to residents and businesses in those neighborhoods.


**KhmerPost USA, LLC**
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA

ផ្សាយពាណិជ្ជកម្ម **Advertising**
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office)
អ៊ីម៉ែលsobenpin@khmerpost.us

អ្នកនិពន្ធ **Editorials**
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស **Contributed Writers:**
Kim Phien, Richard Howe,Jr.

ច្នៃសោភ័ណភាពកាសែត **Design Artist**
Heng Chhunleng
នាយកដ្ឋាបាល Office Manager **978-677-7163**
Thach Vanna ថាច់ វណ្ណា

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at 100.00 or 120 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

តមកពីទំព័រ ១៣ គណបក្សប្រជាជនកម្ពុជារំឭកខួប...

នៅក្នុងទសវត្សរ៍ឆ្នាំ១៩៩០ គណបក្សរាជានិយមដែលពេលនោះមានអំណាចបានតវ៉ាប្រឆាំងនឹងការកំណត់យកថ្ងៃនេះជាថ្ងៃបុណ្យជាតិ។ ហើយសូម្បីក្នុងឆ្នាំ២០០៤ លោក ញឹក ប៊ុនឆៃ បានមានប្រសាសន៍ថា លោកចាត់ទុកថ្ងៃ៧ មករា ជា" ថ្ងៃដែលវៀតណាមឈ្លានពានប្រទេសកម្ពុជា"។

ទោះជាយ៉ាងណា កាលពីម្សិលមិញ លោកបានចូលរួមរំឭកជាមួយគណបក្សប្រជាជនកម្ពុជា ហើយបានជូនកម្រងផ្កាលោក ហេង សំរិន និងលោក ហ៊ុន សែន។

លោក ញឹក ប៊ុនឆៃ បានមានប្រសាសន៍បន្ទាប់ពីពិធីថា "ខ្ញុំទទួលស្គាល់ថា វៀតណាមបានជួយវាយប្រហារ និងផ្តួលរំលំរបប ប៉ុល ពត។ ប្រសិនបើយើងមិនទទួលស្គាល់រឿងនេះ វាមានន័យថា យើងគាំទ្រខ្មែរក្រហម"។

នៅក្នុងសុន្ទរកថារបស់លោក លោក ហេង សំរិន បាននិយាយការពារកេរដំណែលថ្ងៃ៧ មករា ដែលនៅតែត្រូវបានរិះគន់ដោយគណបក្សសង្គ្រោះជាតិថា ជាថ្ងៃដែលរំឭកដល់ការចាប់ផ្តើមការកាន់កាប់ប្រទេសកម្ពុជារបស់កងទ័ពវៀតណាមរយៈពេលដ៏យូរ។

លោក ហេង សំរិន បាននិយាយទៅកាន់អ្នកចូលរួមថា "សត្រូវតែមួយគត់នៃស្មារតី៧ មករា គឺរបបប្រល័យពូជសាសន៍ ប៉ុល ពត។ ហេតុដូច្នេះហើយអ្នកដែលប្រឆាំងស្មារតី៧មករា គឺអ្នកស្រឡាញ់របបប្រល័យពូជសាសន៍ ប៉ុល ពត និងជាអ្នកប្រឆាំងការរីកចម្រើនរបស់ប្រទេសជាតិ"។

លោក ហេង សំរិន ក៏បាននិយាយការពារការកាន់កាប់ប្រទេសកម្ពុជាយូរអង្វែងរបស់កងទ័ពវៀតណាមផងដែរ ដោយពន្យល់ថា វាចាំបាច់ណាស់ក្នុងការធានាថា ប៉ុល ពត មិនអាចត្រឡប់មកកាន់អំណាចវិញ។

លោកបានមានប្រសាសន៍ថា "ប្រសិនបើមិនមានការតស៊ូរបស់ប្រជាជនកម្ពុជា ការគាំទ្ររបស់វៀតណាមនឹងមិនមានឡើយ។ ការគាំទ្រនេះគឺជាការរួមចំណែករំដោះប្រជាជនកម្ពុជាពីឃាតករ និងការពារការរស់ឡើងវិញរបស់ប្រទេសកម្ពុជា ដោយប្រឆាំងចំពោះការព្យាយាមរបស់ក្រុម ប៉ុល ពត ក្នុងការត្រឡប់មកវិញ"។

លោក ហេង សំរិន បានមានប្រសាសន៍ថា កងទ័ពស្ម័គ្រចិត្តវៀតណាមត្រូវបានបញ្ជូនទៅប្រទេសរបស់ខ្លួនជាបណ្តើរៗចាប់ពីឆ្នាំ១៩៨២ ហើយត្រូវបានបញ្ជូនទៅវិញអស់ទាំងស្រុងនៅខែកញ្ញា ឆ្នាំ១៩៨៩ នៅពេលកងទ័ពកម្ពុជាមានសមត្ថភាពការពារបានដោយខ្លួនឯង"។ លោកបានបន្ថែមថា "ហេតុដូច្នោះហើយ អ្នកដែលជាមនុស្សមិនល្អត្រូវឈប់ប្រឌិតប្រវត្តិសាស្ត្រដែលបង្កឱ្យមានជាតិនិយមជ្រុល និងការសងសឹករវាងប្រទេសទាំងពីរ"។

លោកស្រី មូរ សុខហួរ ប្រធានកិច្ចការសាធារណៈគណបក្សសង្គ្រោះជាតិបានបដិសេធមិននិយាយអំពីការជំទាស់របស់គណបក្សប្រឆាំងនេះទៅនឹងការរំឭកថ្ងៃ៧មករាឡើយ។ លោកស្រីបានមានប្រសាសន៍ថា យើងបាននិយាយពីបញ្ហានេះគ្រប់គ្រាន់អស់ហើយ"៕

**សារុន (រាយការណ៍បន្ថែមដោយ Alex Willemyns និង វណ្ណ វ៉ោន)**

Continued from page 12

**The Cambodian People's Party 36-year...**

the regime of Pol Pot. If we do not recognize it, it means that we support the Khmer Rouge ".

In his remarks, Mr. Heng Samrin said protecting legacy January 7, which is still being criticized by opposition National Day, which commemorates the start of the occupied country's Army of Vietnam a long time.

Heng Samrin said to the participants, "the only enemy of the January 7 is the genocide of Pol Pot. Therefore, those who are against the spirit, January 7, you love putting genocide of Pol Pot and the growth of the country. "

Heng Samrin said the defense held the country's long-term Vietnamese army also explained that it is essential to ensuring that Pol Pot could not return to power.

He said, "If there is no struggle of the Vietnamese people support would not exist. This support is contributing to liberate people from the killer and protect the country's resurrection against The Pol Pot's trying to come back. "

Heng Samrin said that the Vietnamese volunteer troops were sent to their country gradually since 1982, and was total return in September 1989, when the army is capable of self-defense ". He added, "Therefore, those who are not good historical fiction that causes extreme nationalist and revenge between the two countries. "

Mu Sochua, head of public affairs party has refused to talk about the opposition's objections to the reminder January 7. She said that we have enough to talk about this issue. "Sarun (Additional reporting by Alex Willemyns and Vann increased)

តមកពីទំព័រទី ០៩

## អភិបាលក្រុងឡូវែលសហរដ្ឋអាមេរិក...

ដោយបង្ខំដើម្បីបើកផ្លូវសម្រាប់គម្រោងអភិវឌ្ឍន៍មួយរបស់សមាជិកព្រឹទ្ធសភាមួយរូបមកពីគណបក្សកាន់អំណាច។

មុនពេលចូលទៅក្នុងពន្ធនាគារលោក រ៉ដនី អេលីយ៉ូត បានលើកឡើងថា "សិទ្ធិមូលដ្ឋានសិទ្ធិមនុស្សជាមូលដ្ឋានដែលយើងទទួលបាននៅក្នុងសហរដ្ឋអាមេរិកចាំបាច់ត្រូវតែទទួលបានដូចគ្នា។ ស្ត្រីទាំងនេះ ម្ចាស់ដីទាំងនេះហាក់ដូចជាមិនទទួលបាននីតិវិធីត្រឹមត្រូវឡើយ ហើយយើងគិតថា វាជារឿងសំខាន់ដែលត្រូវយកបញ្ហានោះទៅពិចារណា"។

នៅខាងក្នុងពន្ធនាគារអ្នកស្រី ទេព វន្នី សកម្មជនសិទ្ធិមនុស្សដ៏លេចធ្លោបានប្រាប់លោក រ៉ដនី អេលីយ៉ូត ថា ផ្ទះរបស់ប្រជាពលរដ្ឋប្រមាណ៦០០គ្រួសារដែលកំពុងរស់នៅក្នុងតំបន់បឹងកក់នៅឡើយ តែងតែលិចទឹកជាប្រចាំដោយសារគ្មានប្រព័ន្ធលូគ្រប់គ្រាន់។

អ្នកស្រីនិយាយថា "យើងទាំងអស់គ្នាត្រូវបានចាប់ខ្លួនដាក់ពន្ធនាគារដោយសារតែយើងតវ៉ាទាមទារឱ្យសាលាក្រុងបូមទឹកចេញពីផ្ទះរបស់យើងដែលទឹកលិចលង់"។

បន្ទាប់ពីចាកចេញពីពន្ធនាគារព្រៃស លោក រ៉ដនី អេលីយ៉ូត បានមានប្រសាសន៍ទៅកាន់ក្រុមអ្នកយកព័ត៌មានថា លោកបានសម្រេចចិត្តមកសួរសុខទុក្ខសកម្មជនទាំងនេះ បន្ទាប់ពីទទួលបានសំណើជាច្រើនពីពលរដ្ឋរស់នៅក្រុងឡូវែល ដែលមានជនជាតិអាមេរិកដើមកំណើតកម្ពុជាប្រមាណ៣០.០០០នាក់ សុំឱ្យលោកជួយពិនិត្យមើលសុខភាព និងសុខុមាលភាពរបស់ពួកគេ។

អភិបាលក្រុងរូបនេះក៏បានមានប្រសាសន៍ដែរថា ក្រុមគណៈប្រតិភូរបស់លោកនឹងស្នើឱ្យរដ្ឋាភិបាលកែប្រែសេចក្ដីសម្រេចរបស់តុលាការក្នុងការផ្ដន្ទាទោស និងឃុំខ្លួនស្ត្រីទាំងនេះ។ លោកមានប្រសាសន៍ថា "យើងនឹងដាក់សំណើសុំឱ្យរដ្ឋាភិបាលពិចារណាឡើងវិញចំពោះសេចក្ដីសម្រេចរបស់តុលាការ។ ផ្អែកតាមការសន្ទនារបស់យើង ពួកគាត់ឱ្យសកម្មជនមិនបានធ្វើអ្វីខុសទេក្រៅតែពីសុំបញ្ចេញមតិ ដូច្នេះការដាក់សំណើរទៅរដ្ឋាភិបាលជាអ្វីដែលយើងនឹងធ្វើ។

ទោះជាយ៉ាងណាលោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្ដីការគណៈរដ្ឋមន្ត្រីបានមានប្រសាសន៍ថា រដ្ឋាភិបាលនឹងមិនពិចារណាសំណើណាមួយពីលោក រ៉ដនី អេលីយ៉ូត ឡើយ។ លោកមានប្រសាសន៍ថា "ក្ដីបារម្ភគឺជារឿងល្អ ប៉ុន្តែវាជាបញ្ហាផ្ទៃក្នុងនៅកម្ពុជា។ ខ្ញុំសោកស្ដាយណាស់ពីព្រោះគាត់គ្មានឱកាសយល់ពីករណីនេះ និងអ្វីដែលជាយុត្តាធិការនៅទីនេះ។ យើងមិនចង់ធ្វើឱ្យគាត់មិនសប្បាយចិត្តទេ ប៉ុន្តែគាត់នឹងស្វែងយល់គាត់នឹងបញ្ជាក់រឿងនោះបានតាមក្រោយពេលគាត់ទៅដល់សហរដ្ឋអាមេរិកវិញ"។

លោកបានមានប្រសាសន៍បន្ថែមទៀតថា សេរីភាពបញ្ចេញមតិនៅកម្ពុជាទូលំទូលាយជាងនៅក្នុងសហរដ្ឋអាមេរិក។ "នៅកម្ពុជាអ្នកណានិយាយអ្វីក៏បាន។ គាត់ឱ្យលោក រ៉ដនីអេលីយ៉ូត អាចនិយាយអ្វីក៏បាននៅកម្ពុជា គឺប្រសើរជាងនៅសហរដ្ឋអាមេរិក ពីព្រោះភ្ញៀវបរទេសឱ្យទៅកាន់សហរដ្ឋអាមេរិក"មិនអាចនិយាយអ្វីអំពីរដ្ឋាភិបាលបានទេ ប៉ុន្តែនៅកម្ពុជាអ្នកអាចនិយាយអ្វីក៏បាន"។

លោក ង៉ោ គឹមជាង តំណាងរាស្ត្រមួយរូបក្នុងចំណោមតំណាងរាស្ត្រពីររូបរបស់គណបក្សសង្គ្រោះជាតិដែលបានអមដំណើរលោក រ៉ដនី អេលីយ៉ូត ចូលទៅក្នុងពន្ធនាគារបានមានប្រសាសន៍ថា លោកមិនភ្ញាក់ផ្អើលចំពោះប្រតិកម្មរបស់រដ្ឋាភិបាលទេ ប៉ុន្តែទោះជាយ៉ាងណា លោកសង្ឃឹមថា អភិបាលក្រុងរូបនេះនឹងមានឥទ្ធិពលខ្លះលើរដ្ឋាភិបាល។

លោកបានមានប្រសាសន៍ទៀតថា "យើងសង្ឃឹមថា ពាក្យសម្ដីរបស់អភិបាលក្រុងរូបនេះ និងការដែលលោកមកពីសហ-រដ្ឋអាមេរិកដែលជាបិតាប្រជាធិបតេយ្យ និងសិទ្ធិមនុស្ស នឹងមានឥទ្ធិពល។ ដូច្នេះសង្ឃឹមថា ពួកគេនឹងស្ដាប់"៕ **សុខុម**

**Continued from page 12**

### Mayor Lowell United States will ask the...

After leaving jail, Rhode Eli Joseph said to the group reporters that he decided to visit activist These, after receiving numerous requests from citizens lived in Lowell native Americans 30,000 people were asked to check their health and well-being.

Mayor also said that his delegation would like the government to modify the court's decision to convicted and detained these women. He said, "We will request the government to consider back to the court's decision. Based on our conversations, they [activists] has done nothing wrong, apart from expression proposal to the government is what we will do. "

However, freedom of assembly, a spokesman of the Council of Ministers, said that the government will not consider any proposals Rhode helium. He said, "The concern is a good thing, but it's a problem surface in the country. I am very sad because he had no opportunity to understand the case and what is the jurisdiction here.We do not want to make him unhappy, but he will find he confirmed that after he came to the United States of America ".

He further said that the freedom of expression in the country widely than in the United States of America. "Who said anything. [Reuters Eli] can say whatever is better than in the US Americans because foreigners [to the US] can not say anything about the government but you can say anything. "

Ngor lawmaker Kim one of the two lawmakers party which accompanied Rhode helium into prison said he was not surprised at the reaction of the government, but, however, Any hope that the mayor will have some influence on government .

He said, "We hope that the words of the mayor and from the United States of America father democracy and human rights, will hapve an impact. So hopefully they will listen.

តមកពីទំព័រទី ១១

## ដំណើរពីអាមេរិកទៅអាស៊ី...

ម្នាក់ៗនឹងបានជួបប្រទះនូវព្រឹត្តិការវប្បធម៌ថ្មីៗ ប្រចាំជីវិតតែរៀងៗខ្លួនដែលអ្នកដំណើរដទៃទៀត ពុំមានសំណាងដូចគ្នានេះទេ ។ ភ្ញៀវពិសេសមួយគ្រួសារទៀត ដែលមកពិបារាំងដែរនោះតែតាមផ្លូវផ្សេងគ្នា គឺលោកស្រីភរិយាលោក សុំស្តែន ហ្វៃណង់ដេស អតិតឧត្តមសេនីយឯកអគ្គមេបញ្ជាការកងទ័ពសាធារណរដ្ឋខ្មែរកូនប្រុសច្បងនឹងប្អូនស្រីពៅ ក៏បានចំណាយពេលក្នុងនាមជាគ្រួសារមកចូលរួមពិធីការនោះដែរ ។

យើងនៅសំណាក់បាត់ដំបងមួយថ្ងៃទៀត មុននឹងចាកចេញទៅសៀមរាបជាបន្តរទៅទៀត យើងបានជិះរ៉ឺម៉កម៉ូតូគឺជាមធ្យោបាយដឹកជញ្ជូនដែលប្រសើរជាងគេ យើងបានទៅទិញសំលៀកបំពាក់ខែក្តៅខ្លះថែមទៀត ពីព្រោះបែកញើសស្មើនឹងបែកញើសនៅសហរដ្ឋ៣-៤ឆ្នាំឯណោះ សូបិនក៏ឆ្លៀតឱកាសទៅទិញក្រម៉ាប្រមាណ១០០ផ្ញើរបងប្អូនឯស្រុកកម្ពុជាក្រោមព្រោះខ្មែរៗនៅឯណោះចូលចិត្តរបស់ប្រើប្រាស់ផ្ទាល់ខ្លួនមកពីស្រុកខ្មែរណាស់ខ្ញុំបានប្រើក្រមារនៅពេលទស្សនាក្នុងនឹងក្រៅក្រុងឃើញថា គេចូលចិត្តនេះជាការត្រឹមត្រូវនឹងមានប្រយោជន៍ណាស់។ ខ្ញុំបានគ្រោងទៅមើលមជ្ឈមណ្ឌលវិបស្សនាកម្មឋានដែលមានតែមួយនៅស្រុកខ្មែរស្ថិតនៅ"ភ្នំទ្រុងមាន់"ដែលអ្នកក្រុងហ្វីឡាដែលហៀវនឹងកាលីហ្វ័រញ៉ាបានផ្តួចផ្តើមក៏សាងនឹងទ្រទ្រង់ជូនប្រជាពលរដ្ឋខ្មែរ ។ យើងក៏បានទៅឃើញមជ្ឈមណ្ឌលដ៏ទូលំទូលាយទទួលសិស្សម្តងបានពី១០០ទៅ២០០នាក់២ដងក្នុងមួយខែ គឺជាជោគជ័យរបស់មជ្ឈមណ្ឌលនឹងជាសំណាងរបស់អ្នកប្រើប្រាស់ដោយសារការកីរិតវិន័យខ្នាតអន្តរជាតិបង្កើនការរំងាប់ផ្លូវចិត្តសិស្សបានយ៉ាងប្រសិទ្ធភាព ។ បាត់ដំបងមានសោភណ្ឌភាពប្លែកជាងពីមុនច្រើន សំណង់ថ្មីៗ មិនជាន់កដណ្តើមដីគ្នា ដូចនៅភ្នំពេញទេ មាត់ស្ទឹងស្អាតភ្លឺងតាមថ្នល់មានដើមផ្កា ឬរុក្ខជាតិ លំអក្រុងអ្នកលក់ដូរ ក្នុងឬក្រៅផ្សារ មានសណ្តាប់ធ្នាប់ គួរឱ្យចាប់ចិត្ត។

ស្អែកឡើងបន្ទាប់ថ្ងៃសម្រាកពីការកូនយើងនាំគ្នាចេញដំណើរទៅខេត្តសៀមរាបបន្តទៅទៀតជាមួយរថយន្តប៊ើសដដែលដំបន់នោះគោលដៅសំខាន់បំផុតរបស់សូបិនដែលជាកូនខ្មែរក្រោមម្នាក់មានមោទណភាពណាស់នឹងប្រាង្គប្រាសាទខ្មែរតែមិនដែលបានឃើញដោយផ្ទាល់ភ្នែកនៅឡើយទេ ចំណែក ប៊ុណ្ណារ៉ូ នៅក្មេងណាស់មិនដឹងជាចាំអ្វីបាននោះទេ មិនខុសពីអ្នកឯទៀតជាបារាំងចិត្តដូចខ្មែរនោះទេ ។ សៀមរាបក៏កំពុងក្លាយជាគោលដៅទេសចរពីភពលោកដ៏សំខាន់មួយ ហើយក៏ទៅជាក្រុងទី២នៃកម្ពុជាបន្ទាប់រាជធានីភ្នំពេញទៅហើយដែរ ដែលពីមុន គឺជាបាត់ដំបងឯណោះទេ ដោយសារវាលយន្តហោះអន្តរជាតិនៅទីនោះ នាំភ្ញៀវមកទស្សនាអង្គរវត្ត៣-៤លាននាក់ ជារៀងរាល់ឆ្នាំ។







សម្រាប់ដំណើរទៅសៀមរាបរបស់យើងគឺទៅជាទេសចរវប្បធម៌សម្រាប់អ្នកដែលមិនដែលបានទៅដល់តែជាការសន្សំថាមពលឡើងវិញ សម្រាប់ខ្ញុំដែលតែងតែស្ញប់ស្ញែងចំពោះស្នាដៃស្ថាបនិកអង្គរ ទាំងប្រាសាទតូច ប្រាសាទធំសុទ្ធតែហួសពីការនឹកស្មានរបស់សាធារណជនថា"ហេតុអ្វីក៏១៥សតវត្សមុន មនុស្សឆ្លាតធ្វើរបស់គង់វង្សបានល្អជាងសព្វថ្ងៃបាន? ភាពស្ញប់ស្ញែងដល់អតីតកាលរបស់ប្រទេសខ្លួនឯង ធ្វើឱ្យខ្ញុំមានមោទនភាពឥតឧបមាដែលជាចំណីនៃអារម្មណ៍បង្កើនកម្លាំងកាលនឹងចិត្តរៀងរាល់ពេលដែលខ្ញុំទៅដល់ទីនោះ។

ទាំងអស់គ្នាគេទៅសម្រាកនៅសណ្ឋាគារតូចស្អាតមួយ...។ នៅមាត់អូរដែលហូរកាត់ក្រុងសៀមរាបលើកលែងតែគ្រួសារខ្ញុំចេញទៅសម្រាកនៅដំណាក់អ្នកអង្គម្ចាស់ ស៊ីសុវត្ថិ ថូមិកូ ដែលខ្ញុំធ្លាប់ស្គាល់រាប់អានគ្នាពីមុនមកផង នឹងជាប់ជាក្រុមគ្រួសាររបស់ ស៊ីរីយ៉ា ទៀតផង ៕

**(នៅមានតទៅភាគ ៦ ទៀត)**




# ជោគជតារាសី
## លោកអ្នកប្រចាំថ្ងៃឆ្នាំមមែ ឆ្នាំ2015





### ឆ្នាំជូត

**រាសី:** រាសីរបស់លោកអ្នកល្មមធ្យម ។

**ការងារ :** រាល់កិច្ចការងាររកស៊ីជួញដូរ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែរាល់កិច្ចការងាររកស៊ីរបស់លោកអ្នកពីដំបូងទីបានជួបនឹងឧបសគ្គខ្លះៗក្ដីតែមិនបាច់ភ័យព្រួយឡើយ ព្រោះក្រោយៗមកអាចមានផលចំណូលចូលជាហូរហៃ ។

**លុយកាក់:** មិនសូវកាក់កបប៉ុន្មានទេ ត្រូវគ្រប់គ្រងចំណាយឱ្យបានល្អ ។

**សុខភាព:** រឹងមាំល្អតែប្រយ័ត្នសុខភាពផ្លូវចិត្តផង ។

**សេចក្ដីស្នេហា:** គូស្នេហ៍អាចមានភាពខ្វែងគំនិតគ្នាបន្តិចបន្តួចត្រូវចេះសម្របសម្រួលគ្នាឱ្យបានល្អ ។



### ឆ្នាំឆ្លូវ

**រាសី:** រាសីរបស់លោកអ្នកល្អបង្គួរ ។

**ការងារ :** រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងឧបសគ្គច្រើន ។ ក្នុងរយៈពេលនេះរាល់សម្ពាធការងារនិងរាល់ឧបទ្រពចង្រៃដែលធ្លាប់មានពីពេលមុនៗមកនោះ នៅមិនទាន់រសាត់អណ្ដែតទៅណាឆ្ងាយឡើយ ដូច្នេះទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺមិនត្រូវមានការធ្វេសប្រហែសឡើយ ។

**លុយកាក់:** កាក់កបគួរសមត្រូវចេះសន្សំសំចៃទុកខ្លះ ។

**សុខភាព:** មិនសូវរឹងមាំប៉ុន្មានទេ ប្រយ័ត្នសុវត្ថិភាពផ្លូវធ្វើដំណើរផង ។

**សេចក្ដីស្នេហា:** គូស្នេហ៍មានការចុះសម្រុងនឹងគ្នាទៅវិញទៅមក ។



### ឆ្នាំខាល

**រាសី:** រាសីរបស់លោកអ្នកស្រុតចុះ ។

**ការងារ :** រាល់កិច្ចការងាររកស៊ីជួញដូរ បានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្ដាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយមិនថាផ្លូវគោកឬផ្លូវទឹក គឺសមប្រកបតែទាំងអស់ ។

**លុយកាក់ :** មិនសូវកាក់កបប៉ុន្មានទេ ត្រូវសន្សំសំចៃក្នុងការចាយវាយ ។

**សុខភាព:** មិនសូវរឹងមាំប៉ុន្មានទេ គួរបន្ថយការដើរហើរពេលយប់ ។

**ស្នេហា:** ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះត្រូវឆាប់បញ្ចប់រឿងរកាំរកូសទើបមានសេចក្ដីសុខ ។



### ឆ្នាំថោះ

**រាសី:** រាសីរបស់លោកអ្នកល្មមធ្យម ។

**ការងារ:** រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចំរើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លាគំនិត ប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វីក៏ដោយក៏អាចដំណើរការបានស្រួលដែរ ។ ចំពោះកំលោះក្រមុំទាក់ទងស្គាល់ចិត្តថ្លើមគ្នាយូរ ហើយអាចគិតគូររឿងរៀបអាពាហ៍ពិពាហ៍ បាន ។

**លុយកាក់:** មិនសូវកាក់កបប៉ុន្មានទេ ត្រូវសន្សំសំចៃក្នុងការចាយវាយ ។

**សុខភាព:** ទន់ខ្សោយត្រូវថែទាំសុខភាពឱ្យបានល្អផង ។

**សេចក្ដីស្នេហា:** គូស្នេហ៍អាចមានភាពខ្វែងគំនិតគ្នាបន្តិចបន្តួចត្រូវចេះសម្របសម្រួលគ្នាឱ្យបានល្អ ។



### ឆ្នាំរោង

**រាសី:** រាសីរបស់លោកអ្នកល្មមធ្យម ។

**ការងារ :** រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ដោយសារតែយីអ៊ុនកំពុងតែដាក់ស្រាប់នោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានក្នុងការបណ្ដាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំ ឬក៏ប្រព្រឹត្តល្បែងស៊ីសងឡើយ ប្រយ័ត្នតែមានការថ្លោះធ្លោយបន្តិចអាចវិនាសអស់ទ្រព្យរលីងពីខ្លួន ។

**លុយកាក់ :** ចំណូលតិចតួចមិនគួរបោះទុនក្នុងពេលនេះ ។

**សុខភាព:** រឹងមាំល្អតែប្រយ័ត្នសុវត្ថិភាពផ្លូវដំណើរផង ។

**ស្នេហា:** ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះត្រូវឆាប់បញ្ចប់រឿងរកាំរកូស ទើបមានសេចក្ដីសុខ ។



### ឆ្នាំម្សាញ់

**រាសី:** រាសីរបស់លោកអ្នកឡើងខ្ពស់ត្រដែត ។

**ការងារ :** រាល់កិច្ចការងាររកស៊ីជួញដូរ មានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែលោកអ្នកអាចរកផលចំណូលបានច្រើនក្រាស់ក្រែលគួរសមក្ដី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្ដោងធំនោះដែរ ។

**លុយកាក់:** ហូរចូលច្រើនតែមិនគួរពង្រីកអាជីវកម្មក្នុងពេលនេះ ។

**សុខភាព:** រឹងមាំល្អពុំមានបញ្ហាអ្វីគួរឱ្យព្រួយបារម្ភទេ ។

**ស្នេហា :** ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានសភាពធម្មតាទេ ។



### ឆ្នាំមមី

**រាសី:** រាសីរបស់លោកអ្នកឡើងខ្ពស់ត្រដែត ។

**ការងារ :** រាល់កិច្ចការងាររកស៊ីជួញដូរ បានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះមានសម្ពាធការងារគាបសង្កត់យ៉ាងខ្លាំង ដូច្នេះទោះជាបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរមានស្មារតីប្រុងប្រយ័ត្នជាប់ជានិច្ច ។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះ ត្រូវចេះប្រយ័ត្នមាត់.កបន្តិច ព្រោះរឿងជម្លោះផ្សេងៗអាចកើតចេញពីពាក្យសំដី ។

**លុយកាក់ :** ហូរចូលច្រើនត្រូវចេះសន្សំសំចៃទុកខ្លះ ។

**សុខភាព:** រឹងមាំល្អពុំមានបញ្ហាអ្វីធដុំទេ ។

**ស្នេហា:** ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ត្រូវឆាប់បញ្ចប់រឿងរកាំរកូស ទើបមានសេចក្ដីសុខ ។



### ឆ្នាំមមែ

**រាសី :** រាសីរបស់លោកអ្នកល្អបង្គួរ ។

**ការងារ :** រាល់កិច្ចការងាររកស៊ីជួញដូរ មានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះទោះ ជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឱ្យសោះ ។

**លុយកាក់:** ចំណូលធម្មតាតែត្រូវប្រយ័ត្នក្នុងការចាយវាយផង ។

**សុខភាព:** រឹងមាំល្អតែប្រយ័ត្នសុវត្ថិភាពដំណើរផ្លូវទឹកផង ។

**ស្នេហា :** ចំពោះគូស្នេហ៍ ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកទីពា ចូលជ្រៀតជ្រែក ។



### ឆ្នាំវក

**រាសី:** រាសីរបស់លោកអ្នកស្រុតចុះ ។

**ការងារ :** រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះលោកអ្នកនឹងមានទ្រព្យហូរចូលច្រើន ព្រោះបើជាអ្នកជំនួញជួញដូរនឹងមានអតិថិជនខ្វះបំណុលខ្លះៗក៏មិនភ័យព្រួយបាត់មួយកាក់មួយសេនដែរ ។

**លុយកាក់:** ខ្សត់ខ្សោយមិនគួរលេងល្បែងភ្នាល់ ។

**សុខភាព:** មិនសូវរឹងមាំប៉ុន្មានទេ ត្រូវសម្រាកឱ្យបានគ្រប់គ្រាន់ ។

**ស្នេហា :** ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបតែភាពផ្អែមល្ហែមដូចទឹកឃ្មុំ ។



### ឆ្នាំរកា

**រាសី:** រាសីរបស់លោកអ្នកល្អបង្គួរ ។

**ការងារ:** រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ លោកអ្នកអាចបើកហាងលក់ដូរថ្មី ឬក៏បណ្ដាក់ទុនរកស៊ី ព្រោះក្រៅពីអាចរកផលចំណូលបានច្រើនក្រាស់ក្រែល ហើយនៅបានប្រមូលអតិថិជនបានច្រើនទៀតផង ។

**លុយកាក់:** ហូរចូលច្រើនអាចពិចារណាធ្វើការបោះទុនពង្រីកអាជីវកម្ម ។

**សុខភាព:** រឹងមាំល្អធម្មតា ។

**ស្នេហា :** ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានភាពល្អូកល្អិនល្អណាស់ ។



### ឆ្នាំច

**រាសី:** រាសីរបស់លោកអ្នកល្មមធ្យម ។

**ការងារ :** រាល់កិច្ចការងាររកស៊ីជួញដូរ ជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរចេះសម្របសម្រួល និងចេះប្រែប្រួលទៅតាមកាលៈទេសៈ ។ ក្រៅពីនេះចូរប្រយ័ត្នប្រយែងក្រែងជួបគ្រោះថ្នាក់ផ្សេងៗ ជាពិសេសក្នុងពេលធ្វើដំណើរ ។

**លុយកាក់:** ចំណូលតិចតួចមិនគួរលេងល្បែងផ្សងសំណាង ។

**សុខភាព:** រឹងមាំល្អពុំមានបញ្ហាអ្វីគួរឱ្យព្រួយបារម្ភទេ ។

**សេចក្ដីស្នេហា:** គូស្នេហ៍អាចមានភាពខ្វែងគំនិតគ្នាបន្តិចបន្តួចត្រូវចេះសម្របសម្រួលគ្នាឱ្យបានល្អ ។



### ឆ្នាំកុរ

**រាសី:** រាសីរបស់លោកអ្នកឡើងខ្ពស់ត្រដែត ។

**ការងារ :** រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងជម្លោះកើតឡើង ចូរចេះអត់ធ្មត់ និងរម្ងាប់ចិត្តឱ្យបានត្រជាក់ដាច់ខាតមិនត្រូវតបតទាំងកំហឹងទល់នឹងកំហល់ឡើយ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។

**លុយកាក់:** ហូរចូលច្រើនត្រូវចេះសន្សំសំចៃទុកខ្លះ ។

**សុខភាព:** រឹងមាំល្អពុំមានបញ្ហាអ្វីធំដុំទេ ។

**ស្នេហា:** ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះត្រូវឆាប់បញ្ចប់រឿងរកាំរកូស ទើបមានសេចក្ដីសុខ ។




# ស៊ូឱ្យមានមិត្តច្រើនជាជាងបង្កើនសត្រូវច្រើន

●●● តទៅលេខក្រោយ

និងក្នុងសមុទ្រជាដើម ។ល។

នៅពេលបញ្ហាវិបត្តិបានកើតឡើង ដោយសារមនុស្សបង្កើតខ្លួនឯងនៅក្នុងសង្គមគ្រួសារ ពេលនោះមេគ្រួសារត្រូវតែមានចិត្តក្លាហានហ៊ានលើកបញ្ហានេះទៅប្រាប់ជនដទៃឱ្យចូលរួមជួយដោះស្រាយ បើដោះស្រាយមិនរួចត្រូវតែលើកបញ្ហានោះ ទៅដល់អ្នកច្បាប់ខាងតុលាការឱ្យជួយដោះស្រាយទៅតាមផ្លូវច្បាប់ក្នុងយុត្តិធមិសុច្ចរិតល្អត្រឹមត្រូវដើម្បីបញ្ចប់បញ្ហាវិបត្តិនោះទៅ។

ចំណែកនៅក្នុងសង្គមជាតិដែលមានប្រមុខដឹកនាំកំពូលរួមទាំងនាម៉ឺនមន្ត្រីគ្រប់ជាន់ថ្នាក់ជាអ្នកដឹកនាំគ្រប់គ្រងលើប្រទេស និងប្រជាជាតិ នៅពេលណាប្រមុខដឹកនាំកំពូលនោះ ជាបុគ្គលចេញមកពីចំណោមមនុស្សខ្វះសមត្ថភាព អវិជ្ជា អត់គុណធមិ អសីលធមិ អយុត្តិធមិ ពេលនោះហើយបញ្ហាវិបត្តិក្នុងសង្គម និងនយោបាយគ្រប់វិស័យវានឹងកើតឡើងនៅក្នុងសង្គមជាតិនោះជាប់ជានិច្ច ហើយចេះតែកើនច្រើនឡើងៗរហូតដល់ជំពាក់វាក់វិនស្មុគស្មាញដោះស្រាយលែងចេញតែម្តង។

នៅពេលដែលមានបញ្ហាជំពាក់វាក់វិនដូច្នេះ អ្នកដែលមានសមត្ថភាពគ្រប់គ្រាន់ជួយដោះស្រាយបានដោយជ្រះស្រឡះនោះគ្មានអ្នកណាក្រៅពីកល្យាណមិត្តដ៏ល្អត្រឹមត្រូវរបស់ខ្លួននោះឡើយដែលជាជាតិសាសន៍ដូចគ្នាជាពូជពង្សជាមួយគ្នាមានមាតុភូមិរស់នៅជាមួយគ្នារួមសុខរួមទុក្ខជាមួយគ្នា ។ចំណែកជាតិសាសន៍ដ៏ទៃនោះវិញ មានខ្លះអាចមានសមានចិត្តស្មោះត្រង់ចង់ជួយអោយបានលួតលាសរីកចំរើនរុងរឿងដោយ

តទៅលេខក្រោយ










# CLASSIFIED ADS

CALL: 978.677.7163

EMAIL: SOBENPIN@KHMERPOST.US

# គន្លឹះ៦ចំណុចតុបតែងមុខដោយខ្លួនឯង



១. -លាបម្សៅទ្រនាប់ បិទបាំងស្នើង១នៅក្រោមភ្នែក ឬកន្លែងមានស្លាកស្នាម ។ ប្រសិនបើអ្នកមានស្បែកស្អាត និងមានសុខភាពល្អនោះគ្រាន់តែលាបក្រែមការពារកម្តៅថ្ងៃ និងម្សៅទ្រនាប់លើស្បែកបានហើយ ។

២. -លាបម្សៅ (ម្សៅហុយ ឬម្សៅ ស្អិត) លើផ្ទៃមុខថ្នម១ដោយប្រើជក់ធំ ។
**សម្គាល់ :** អ្នកអាចប្រើម្សៅទ្រនាប់ផាត់បន្ទាប់ពីការលាបក្រែមការពារ កម្តៅថ្ងៃ ប៉ុន្តែសូមប្រើតិចតួចបានហើយ បើមិនដូច្នោះទេ វានឹងធ្វើឱ្យស្បែកអ្នកស្លូតមើលទៅក្រាស់ និងស្រមក ។

៣. -ផាត់ស្រមោលពណ៌ត្នោត ឬស្រគាំនៅលើត្របកភ្នែកស្តើង១ ។ សម្រាប់យុវតី គួរប្រើពណ៌ផ្កាឈូក លាយពណ៌ត្របែកព្រៃ ឬត្នោត ប៉ុន្តែត្រូវចៀសវាងពណ៌ស្រមោលបៃតង ឬខៀវ ដែលបង្វែរចំណាប់អារម្មណ៍ចេញពីភ្នែកពណ៌ខ្មៅរបស់អ្នក ។

៤. -គូសត្របកភ្នែកស្តើង១ ដោយប្រើខ្មៅដៃ ឬជក់សើម នៅលើខ្សែបន្ទាត់រោមភ្នែក ។

៥. -លាបម៉ាស្ការ៉ាពណ៌ខ្មៅ ឬត្នោតចាស់មួយជាន់ ដើម្បីឱ្យរង្វង់ភ្នែករបស់អ្នកបានស្អាត ។

៦. -ជាចុងក្រោយលាបក្រែមពណ៌ថ្លា ឬភ្លឺនៅលើបបូរមាត់ ។ ប្រសិនបើអ្នកមានស្បែកស្លេក អ្នកត្រូវលាបពណ៌ឱតលើបបូរមាត់ ប៉ុន្តែកុំឱ្យវាស្រគាំខ្លាំងពេក ៕




The Cambodian-American Biweekly Newspaper

សារព័ត៌មានខ្មែរ-អាមេរិក ចេញពីរសប្តាហ៍ម្តង

a free local newspaper reaching over 20,000 Cambodian readers in the Greater Lowell area every two weeks

ផ្តល់ជូនកាសែតឥតគិតថ្លៃដល់អ្នកអានខ្មែរច្រើនជាង២០០០០នាក់នៅតំបន់ឡូវែលរាល់ពីសប្តាហ៍ម្តង

Soben Pin, Managing Partner អ្នកគ្រប់គ្រង សុបិន្ត ពិន

978.677.7163 (Office) 978. 656.8141 (Mobile)

សូមកក់ពាណិជ្ជកម្មអ្នកជាមួយយើងខ្ញុំ ហើយទទួលបានការបញ្ចុះតម្លៃ២០%

**Reserve Your 2015 Ads with us today and receive up to 20% OFF!**

## Sample of our affordable pricing បញ្ជីតម្លៃពាណិជ្ជកម្មក្នុងតម្លៃសមរម្យ

| ទំហំទំព័រ<br>Page Size | ប្រវែង<br>Length x Width | 1ខែ<br>1 month<br>10%OFF |
|---|---|---|
| 1/2 page color | (6.5"x10") | $484 |
| 1/4 page color | (6.5"x5") | $264 |
| 1/8 Classify ad | (3.25"x5") | $100 |
| Business Card | | $50 |

## Our 2015 Publishing Dates កាលវិភាគបោះពុម្ព

January 2th & 23rd
February 6th & 20th
March 6th & 20th
April 3rd & 24th

*all ad materials are due one week prior to publishing date.

រាល់គំរូពាណិជ្ជកម្មត្រូវបញ្ជូន1សប្តាហ៍មុនចូលរោងពុម្ព




## Call or Visit our Sales Office

45 Merrimack Street. Suite 218A. Lowell, MA 01852
Tel: 978.677.7163. Cell: 978. 656.8141 Fax: 978.677.7092
Email: sobenpin@khmerpost.us or KhmerPostUSA@gmail.com
www.khmerpost.us | www.facebook.com/KhmerPostUSA




# Press Club

## Friday, January 30th, 2015
## 12PM-2PM
## LTC. 246 Market St. Lowell, MA 01853






*Photos by: Richard Howe. 2013 Press Club*

The Press Club is an event that fosters discussion amongst community members and leaders about the issues of the day. The topic of this event includes safe rental housing, education, and small business. You will have the opportunity to talk with city leaders about the pressing issues in the Cambodian community of Lowell. Guests are encouraged to purchase your own lunch from many delicious restaurants in downtown Lowell and bring to the meeting.

ក្លឹបសារព័ត៌មានផ្ដល់ឱកាសជំរុញឱ្យមានកិច្ចដោះស្រាយបញ្ហាក្នុងសហគមន៍ រវាងសមាជិកនឹងមេដឹកនាំ ស្វែងរកដំណោះស្រាយបញ្ហាទីលំនៅឱ្យមានភាពសន្តិសុខ បញ្ហាសិក្សាអប់រំ និងអាជីវកម្មផ្សេងៗទៀត អស់លោកអ្នកនិងមានឱកាសពិភាក្សាជាមួយនឹងអ្នកតំណាងក្រុងឡូវែលក្នុងពិធីសន្និសីទកាសែតស្ដីពីបញ្ហាសហគមន៍ខ្មែរក្រុងឡូវែល ។ ភ្ញៀវកិត្តិយស និងមានការលើកទឹកចិត្តដោយផ្ដល់ជម្រើសម្ហូបឆ្ងាញ់ពិសារនៅភោជនីយដ្ឋានក្នុងក្រុងឡូវែល ដើម្បីយកទៅចូលរួមក្នុងអង្គប្រជុំផងដែរ ៕

**Contact: Soben Pin, MNG Partner**
**Phone: 978-677-7163/978-656-8141**
**Email: sobenpin@khmerpost.us**